# KhmerPost USA

សុបិន : (267) 253-3947, សែម : (781) 244-0522

VOL. 06 ISSUE 101 Feb. 24th - Mar. 8th, 2012


មាតិការរឿង ទំព័រ



# បន្តដណ្តើមដំណែងជាបេក្ខជនប្រធានាធិបតីអាមេរិកាំងរបស់គណបក្សសាធារណរដ្ឋ

**Results:** លទ្ធផលចុងក្រោយ

បេក្ខជននៃគណបក្សសាធារណរដ្ឋនៅតែបន្តការដណ្តើមសន្លឹកឆ្នោតពីសមាជិកគណបក្សរបស់គេថា នរណាមួយជាអ្នកឈ្នះលើការទុកចិត្តរបស់ពលរដ្ឋ ដើម្បីទៅដណ្តើមដំណែងជាមនុស្សទី១នៃស.រ.អានេះ ។ រីឯគណបក្សប្រជាធិបតេយ្យគេពុំមានបេក្ខជនណាទៅដណ្តើមដំណែងជាបេក្ខជនតទល់នឹងបច្ចុប្បន្នប្រធានាធិបតី បារ៉ាក អូបាម៉ា ទេ។

Barack Obama

នៅចុងខែកុម្ភៈនេះ ថ្វីត្បិតតែ មីត រ៉ុមនី បានឈ្នះសម្លេងទុកចិត្តបានច្រើនជាងគេក្តីក៏សម្លេងរបស់ រ៉ន ផល នៅមិនឆ្ងាយនៅឡើយ -រីឯ សង់តូរ៉ូម

តទៅទំព័រទី ១៨

Caucuses held by Saturday, February 11

Maine Republican caucuses, 2012

| Candidate | Votes (Feb. 11 count) | Votes (Feb. 17 count) | Percentage (Feb.11 count) | Percentage (Feb.17 count) |
|---|---|---|---|---|
| Mitt Romney | 2,190 | 2,269 | 39.2% | 39.0% |
| Ron Paul | 1,996 | 2,030 | 35.7% | 34.9% |
| Rick Santorum | 989 | 1,052 | 17.7% | 18.1% |
| Newt Gingrich | 349 | 391 | 6.2% | 6.7% |
| Others | 61 | 72 | 1.1% | 1.2% |
| Unprojected delegates: | | | | |
| Total: | 5,585 | 5,814 | 100.0% | 100.0% |


សត្រូវរបស់ប្រជាជន

ENEMIES OF THE PEOPLE

A PERSONAL JOURNEY INTO THE HEART OF THE KILLING FIELDS

ដំណើរដោយផ្ទាល់មួយចូលទៅកាន់បេះដូងនៃវាលពិឃាត

EXCLUSIVE: Confessions of Nuon Chea aka Brother Number Two

ចំលើយសារភាពទាំងស្រុងរបស់បងធំទីពីរនួនជា

Over SIX HOURS of extra film footage

ប្រាំមួយម៉ោងជាងបន្ថែមលក្ខណៈពិសេស

DVD available now from amazon.com

DVD មានចេញលក់ហើយពី amazon.com

"One of the most important films about Cambodia ever made." *Wall Street Journal*

ជារឿងមួយដ៏សំខាន់ដែលមិនធ្លាប់បានផលិតអំពីប្រទេសកម្ពុជា *Wall Street Journal*

2 Disc Special Edition DVD available from

www.enemiesofthepeoplemovie.com



300+ Cars a week

INTERSTATE Auctioncar.net Auto Auction (603) 893-7777

$6,800 2003 Acurs MDX

Public Car Auction Open to All

ការដេញថ្លៃលក់ឡានជាសាធារណៈ

300+ Cars for Wholesale Prices This Coming Wednesday and Saturday Look Inside for Car Price, Auction Dates & information about How the Auction Works

៣០០ឡានសំរាប់តម្លៃដើម ការដេញនឹងមកដល់នៅថ្ងៃពុធ និងថ្ងៃសៅរ៍ អាចមើលតម្លៃក្នុងឡាន មើលកាលបរិច្ឆេទនៃការដេញថ្លៃ និងព័ត៌មានអំពីរបៀបដេញថ្លៃ

20 minutes from Lowell, MA

នៅ២០នាទីពីឡូវែល

just over 1hour from providence and Revere, MA

នៅជាង១ម៉ោង ពីប្រាវីដិន និង រីវើម៉ាស្សាឈូសេត

www.interstateautoauction.com



COMING SOON - GRAND OPENING MARCH 1ST!

VMART

THE LARGEST ETHNIC FOOD MARKET IN NEW ENGLAND

ហាងលក់ម្ហូបអន្តជាតិធំជាងគេនៅប្រទេសអង់គ្លេសថ្មី

SPECIAL DISCOUNT ON OPENING DAY!

176 Narragansett Ave
Providence, RI 02907
Open 7days of the week:
Sunday - Friday : 9am - 8pm
Saturday : 8am - 8pm

យើងមានម្ហូបសមុទ្រស្រស់ហើយរស់

- មានលក់ម្ហូបគ្រប់មុខមកពីអាស៊ី និងពីភូមិភាគខាងកើត
- មានម្ហូបសមុទ្រច្រើនមុខ ដូចជា ត្រី និងបង្គាស្រស់
- មានបន្លែស្រស់ៗច្រើនយ៉ាង ហើយផ្លែឈើតាមរដូវ
- មានម្ហូបរក្សាឱ្យកក ច្រើនបែប
- មានម្ហូបចម្អិនដាក់ក្នុងប្រអប់ ច្រើនប្រភេទ មានហិរ ឬរស់ជាតិឆ្ងាញ់
- មានលក់គ្រឿងសម្រាប់អំណោយ, អីវ៉ាន់ផ្សេងៗ និងរបស់ប្រើក្នុងផ្ទះ

មានលក់កាតទូរស័ព្ទ

ចាប់បើកហើយ នៅថ្ងៃទី ១ ខែមីនា

# សារព័ត៌មានខ្មែរប៉ុស្តិ៍ ស.រ.អា លេខ 100

**ដោយ : គឹម ភឿន**



សារព័ត៌មានខ្មែរប៉ុស្តិ៍ចាប់កំណើតហើយរីកចំរើនឡើងដោយសន្សឹមៗសឹងតែដើរទៅមុខពុំរួច មកពីចំ - នួនអ្នកអានភាសាខ្មែរតិច.មកពីអ្នកពាណិជ្ជករខ្មែរតិចតួចផង បើប្រៀបធៀបនឹងពាណិជ្ជករជនជាតិដទៃនឹងថែមទាំងមិនសូវយល់ពីអត្ថប្រយោជន៍ នៃការផ្សាយពាណិជ្ជកម្មលើទំព័រសារព័ត៌មានផង ។ មកពីកត្តាទាំងនេះ ទើបសារព័ត៌មានខ្មែរប៉ុស្តិ៍ងើបឈររួចហើយដើរសន្សឹមៗចេះតែចង់ដួលរលំម្តងៗទៅវិញ ។ ប៉ុន្តែការខំប្រឹងទប់ជំហរតស៊ូក្រាញនៀវល ពីមួយថ្ងៃទៅមួយថ្ងៃ. មួយអាទិត្យទៅមួយអាទិត្យ. មួយខែ... មួយឆ្នាំទៅមួយឆ្នាំមិនឱ្យខកខានមួយលេខណាឡើយ ។ យើងទាំងអស់គ្នាប្រឹងរួចគ្នាទាំងចាងហ្វាង ទាំងក្រុមអ្នកនិពន្ធ ទាំងក្រុមអ្នកបច្ចេកទេសផ្សេងៗ បានមូលមតិគ្នាថា ក្រាញនៀវលឱ្យសារព័ត៌មានខ្មែរនេះឆ្លងកាត់ឱ្យផុតពីគ្រោះភ័យនៃការបិទទ្វារជាសារវ័ន្ត ។ ហើយចិត្តសច្ចារ នោះបានក្លាយជាការពិតខ្មែរប៉ុស្តិ៍បានឈរជាប់នឹងមានភាពរឹងមាំរហូតដល់លេខមួយរយ (១00) ហើយ ។

ហេតុអ្វីក៏យើងចង់ឱ្យសារព័ត៌មានខ្មែរនេះឈរជាប់នៅក្នុងសហគមន៍យ៉ាងទទូចយ៉ាងនេះ? ព្រោះសារព័ត៌មានរបស់សហគមន៍នីមួយៗមានផលប្រ-យោជន៍ច្រើនប្រការសម្រាប់សហគមន៍នោះៗណាស់។ យើងរស់នៅស្រុកនេះហាក់ដូចជាឯកោណាស់ មកពីធ្វើការបិទទ្វារជិតនៅក្នុងផ្ទះ ប្រៀបបានដូចនៅក្នុងពិភពលោកមួយដាច់តែឯង គ្មានភាពកក់ក្តៅសោះឡើយ ។លោកអ្នកចាំឬទេ? កាលដែលយើងដាក់ជើងមកដល់សហរដ្ឋអាមេរិកពីដំបូង យើងអរណាស់ពេលបានជួបខ្មែរម្នាក់តាមផ្លូវ ឬនៅទីកន្លែងណាមួយយើងរាប់រករាក់ទាក់សួរនាំដូចជាបងប្អូន សួររកអាស័យដ្ឋាន. លេខទូរស័ព្ទក្នុងបំណងហៅរកគ្នា ឬនិយាយប្រាប់គ្នាពីហេតុការណ៍ដែលកើតមាននៅទីនេះ ដែលម្នាក់ៗដឹងនឹងយល់ សម្រាប់ជួយគ្នាឱ្យបានដឹងយល់គ្រប់គ្នាក្នុងបំណងជៀសវាងគ្រោះថ្នាក់ ឬបានទទួលនូវផលប្រ-យោជន៍ ។ ប្រសិនណាយើងមានសារព័ត៌មានជាភាសាជាតិយើងមួយ ប្រយោជន៍ធំបំផុតសម្រាប់ខ្មែរណាមិនចេះភាសាអង់គ្លេស គឺអស់លោកចាស់ទុំដែលបានចេះតែភាសាជាតិឯង គ្រាន់បានយល់ហេតុការណ៍ខ្លះៗដែលកំពុងកើតមានរាល់ថ្ងៃ នៅទីនេះនឹងនៅលើពិភព-លោកទៀតផង ។ មានសារព័ត៌មានជាភាសាជាតិមួយអាន ហើយយើងយល់ក្នុងចិត្តយើងជាស្រេចថា នៅទីនេះមិនមែនមានតែយើងម្នាក់ជាខ្មែរទេ មានបងប្អូនយើងជាខ្មែរឯទៀតដែរកំពុងរស់នៅទីនេះ យើងមិនកំព្រាមិនតែលតោលតែម្នាក់ឯងទេ ។ ការដែលដឹងថា មានគ្នានេះហើយដែលយើងអាចប្រមូលគ្នាចងក្រងគ្នា ដើម្បីផលប្រយោជន៍រួមដែលបុគ្គលម្នាក់មិនអាចទាមទារផលប្រយោជន៍នោះតែម្នាក់ឯងបានឡើយ។

មិត្តអ្នកអានមុខតែសួរថា ចុះខ្មែរប៉ុស្តិ៍ក្រោកឈរនឹងបោះជំហានដើរទៅមុខបាន រហូតដល់លេខ១00 ទៅហើយ តើសហគមន៍ខ្មែរបានផលចំណេញអ្វីខ្លះ? យើងសូមឆ្លើយនូវចម្លើយជាវិជ្ជមានថា ផលចំណេញមានហើយនឹងកំពុងមានបន្តទៅមុខថែមទៀត កាន់តែខ្លាំងឡើងតាមទំហំពេលវេលា ប្រសិនបើយើងនៅតែខំតស៊ូ ស្រាវជ្រាវរុករកផលប្រយោជន៍ទាំងនោះ ជាសមូសភាពតទៅទៀត ។ យើងខ្ញុំសុំបង្ហាញជូននូវផលប្រយោជន៍ដែលយើង កំពុងទទួលបានសព្វថ្ងៃនេះដូចតទៅ:

**១**-បងប្អូនកំពុងមានកាសែតជាភាសាជាតិសំរាប់អានដូចសព្វថ្ងៃនេះ ជាផលចំណេញមួយដ៏ធំ ព្រោះសារព័ត៌មានមួយសម្រាប់សហគមន៍ មិនមែនជាការងាយស្រួលឡើយ ឥឡូវបងប្អូនបានគាំទ្រឱ្យសារព័ត៌មានជាតិកើតឡើងបានហើយ នោះជាការរួមចំណែកដ៏ថ្លៃថ្លារបស់បងប្អូន គួរតែខំគាំទ្រតទៅទៀត ដើម្បីរក្សាសម្មិទ្ធ-ផលរបស់បងប្អូនកុំឱ្យដួលរលំទៅវិញ។

**២**-សារព័ត៌មាននេះបានឱ្យយើងដឹងថា យើងមានបងប្អូនរួមឈាមយើងនៅតែក្នុងស្រុក (Country) ហ្វីឡាដែលហ្វៀនេះមានចំនួនដល់ទៅ៣0.000 (បីម៉ឺននាក់) ទៅហើយ ហើយដោយសារក្រុមសារព័ត៌មាននេះចេះតែរុករកស្រាវជ្រាវថែមទៀត ដូចដែលឡូវែរ, ម៉ាសាឈូសេត, ម៉ែរីឡែន... ។ល។ សាច់ឈាមយើងនៅគ្រប់ទិសទីអាចប្រមូលផ្តុំមកជួយធ្វើកិច្ចការធំៗបាន ឬជួយរកផលប្រយោជន៍ធំៗចែកគ្នាបានដោយងាយស្រួល ។ យើងនិយាយនេះចំពោះតែខ្មែរណាដែលមានចិត្តស្មោះចង់យកចំណេះដឹងខ្លួនមកបំរើជាតិ ឬសហគមន៍ខ្លួនដោយសុទ្ធចិត្ត ។ ព្រោះយើងសព្វថ្ងៃមានចិត្តអស់អែករារែកណាស់ដែរ ដោយសម្លឹងឃើញសហគមន៍យើង.អស់លោកអាចារ្យយើងព្រះសង្ឃយើងមួយចំនួនច្រើនបានដើរផ្លូវវៀចវេរស្គាល់តែលុយ.ហ៊ានលក់ដីលក់វត្តព្រោះតែលុយ. ហ៊ានក្តីហ៊ានក្តាំបំពានព្រោះតែលុយ លុយជាធំលើស អ្វីៗទាំងអស់. មិនថានៅក្នុង ឬក្រៅប្រទេសឡើយ. នៅឯណាក៏ដូចតែគ្នាទេ. រហូតដល់លុយបានរុញច្រានប្រទេសជាតិទៅស្ថិតក្បែរជ្រោះមរណាទៅហើយតែអ្នកដែលឈឺឆ្អាលភ្ញាក់ដឹងខ្លួនមានតិចពន់ពេក ។ អនាគតទៅប្រទេសជាតិយើងនឹងរលាយ ប្រសិនបើម៉ាស៊ីនដឹកនាំរដ្ឋរបស់យើងនៅតែ**ត្រាំនៅក្នុងអន្លង់ពុករលួយ និងវង្វេងវក់វីក្នុងរឿងលុយនេះ** ។ អ្នកសរសេរអត្ថបទពីបញ្ហាសារព័ត៌មានលេខ១00នេះ មានជំនឿជាក់ក្នុងចិត្តថា សារព័ត៌មានខ្មែរប៉ុស្តិ៍សហរដ្ឋអាមេរិកជាអាវុធមុតស្រួចដើរតាមមាគ៌ាសន្តិភាព និយមអាព្យាក្រិតមុខតែមិនបណ្តោយឱ្យអំពើពុករលួយល្បែងពាលាស្មារតីវក់វីវង្វេងវង្វាន់ក្នុងរឿង**លុយ**នោះដឹកមុខបានឡើយ ។

ខ្មែរប៉ុស្តិ៍លេខ 01



ខ្មែរប៉ុស្តិ៍
THE KHMER POST
Today Pharmacy
Los Angeles & Long Beach
PHNOM PENH EXPRESS

ខ្មែរប៉ុស្តិ៍លេខ 100



ខ្មែរប៉ុស្តិ៍
KhmerPost USA
Printing The Cambodian World News
ស្វាគមន៍ សមាគមខ្មែរនៅឡូវែល
978-441-1005

ប្រសិនបើមានស្មារតីបែបនោះអត្ថបទនេះអាចបញ្ចប់ត្រឹមនេះមិនបាច់សរសេរតទៅទៀត នាំឱ្យខាតពេលសរសេរនឹងអានឡើយ ។ តែក្នុងចិត្តជឿច្បាស់ថា បំណាច់រត់ចោលស្រុកមកតែពីស្អប់អំពើពុករលួយ. ស្អប់ការកេងប្រវ័ញ្ច. ចង់ស្វែងរកយុត្តិធម៌.ចង់រស់ទីណាដែលមានមេត្តា ករុណា ជាពិសេសជឿជាក់ទៅលើច្បាប់. លក្ខន្តិកៈនិងចំណេះដឹងរៀងៗខ្លួន.ការអស់ទាំងនេះអាចនាំយើងឱ្យកសាងសង្គម ឬសហគមន៍មួយតាមគន្លងធម៌ដែលគ្មានអំពើកេងប្រវ័ញ្ច. អាចរកក្តីសុខ និងប្រយោជន៍ជូនសមាជិក ឬសហគមន៍បានពិតប្រាកដ ។

មិត្តអ្នកអានពិតជាបានដឹងថា តាំងពីសារព័ត៌មាននេះកើតឡើងបងប្អូនរួមឈាមយើងបានស្គាល់គ្នា. ទាក់ទងគ្នាកាន់តែទូលំទូលាយ. ពីរដ្ឋមួយទៅរដ្ឋមួយទៀត រហូតឆ្លងកាត់ទ្វីបទៅកាណាដា. អឺរ៉ុប. អូស្ត្រាលីជាដើម ។ បើនិយាយពីការដែលសារព័ត៌មាននេះធ្វើបាននោះ គឺពង្រីកចំនួនអ្នកអានពី៤000នាក់ពីដំបូងរហូតដល់សព្វថ្ងៃនេះមានអ្នកអានរហូតដល់១៥.000 -២0.000នាក់ហើយ គឺពាសពេញតែឆ្នេរខាងកើតនៃសហរដ្ឋអាមេរិកទៅហើយ នេះមិនមែនចប់ត្រឹមហ្នឹងទេ តែវាគ្រាន់តែជាសារមួយប្រាប់ថា គ្រាប់ពូជរបស់ខ្មែរ បានលេចមុខចេញមកបំរើសហគមន៍ខ្មែរហើយកម្មវិធីដែលត្រូវធ្វើកំពុងមាន នឹងមានហូរចេញមកជាថ្មីទៀតជាបន្តបន្ទាប់ ព្រោះខ្មែរយើងទើបតែចាប់ផ្តើមប៉ុណ្ណោះ ។ ការដែលយើងត្រូវធ្វើដើម្បីបានផលចំណេញ នឹងសារប្រយោជន៍ជូនសហគមន៍យើងមានច្រើនណាស់ តែមុននឹងទាញយកសារប្រយោជន៍ និងផលចំណេញទាំងនោះបាន ត្រូវធ្វើសកម្មភាពឱ្យបានសមស្របដូចចិនគេចង់មានបាន គេត្រូវបើកហាងលក់ដូរដែលជាសកម្មភាពត្រូវតែធ្វើខានមិនបាន ។ ឯយើងវិញក៏ដូចគ្នាតែធ្វើម៉េចកើត បើយើងគ្មានលុយគ្មានជំ - នាញដូចសព្វថ្ងៃនេះ? រឿងហ្នឹងហើយដែលខំប្រមូលគ្នាបង្រៀនគ្នាបន្តបន្ទាប់រៀងទៅ ។

ដើម្បីការងារយើងបានសម្រេចជោគជ័យកុំឱ្យមានថ្លោះធ្លោយយើងត្រូវយកទ្រឹស្តីមួយរបស់អ្នកប្រាជ្ញអ៊ីស្រាអែលមកធ្វើជាត្រីវិស័យចុះ: "មុននឹងយើងកសាងសម្មិទ្ធ ឬគំរោងការណ៍អ្វីមួយគេត្រូវមាន: **ទី១:** មនុស្ស. **ទី២:** ចំណេះដឹង ឬវិជ្ជា. **ទី៣:** លុយ ។ មនុស្សក្នុងទីនេះ គឺមនុស្សល្អ. ស្មោះត្រង់ចង់បំរើសហគមន៍. ចំណេះដឹងជាកត្តាសំខាន់ទីពីរ ឯលុយ ឬដើមទុនជាកត្តាទី៣ទេ ។ បើមានកត្តាសំខាន់២ខាងដើមហើយកត្តាទី៣រកបានដោយងាយស្រួលទេ បើគ្មានកត្តាពីរខាងដើមទេ សុំកុំមានគំរោងធ្វើអ្វីឱ្យសោះ មានលុយប៉ុន្មានក៏ឥតប្រយោជន៍ដែរ ។ ក្រុមសារព័ត៌មានខ្មែរប៉ុស្តិ៍សហរដ្ឋអាមេរិក កំពុងមានកត្តា២ខាងដើមហើយកំពុងបណ្តុះបណ្តាលបន្ថែមទៀត ហើយមានបំណងបង្រៀនគ្នាឱ្យចេះ នឹងយល់ដឹង ដើម្បីឱ្យសមាជិកទាំងអស់គ្នាអាចចេះធ្វើជាប្រធាន. លេខា. គណនីគ្រប់ៗគ្នា ។ របៀបនេះអាចការពារបាននូវកំហុសឆ្គង ដែលអាចធ្វើឱ្យសម្មិទ្ធផលកើតឡើងបានហើយអាចរលំបានទៅវិញដែរនោះ ។

**(ភាគ២នៃអត្ថបទនេះតទៅលេខក្រោយ)**

300+ Cars a week



បើកកម្មវិធីដេញថ្លៃឡានជាសាធារណៈ

INTERSTATE Auto Auction

Auctioncar.net (603) 893-7777

In Salem, NH-Just 20 Minutes from Lowell MA

OPEN TO THE PUBLIC LIVE CAR AUCTION

Saturdays 10:30AM

Test Starts/Preview! Starts at 9AM

Wednesdays 5:30PM

Free Test Drives Before You Buy!

Starts Wednesday at 9AM-5PM

Only 40 Minutes From Lynn and Revere, MA
Just Over 1 Hour from Providence, RI
Or You Can Even Bid Online From Philadelphia, PA or New Jersey and Have The Car Delivered to Your Home"

www.interstateautoauction.com

NH Lic#Auctioneer Alan Chambers/20 Hampshire Road - Salem NH 03079










-ឥតមានកក់លុយ សម្រាប់ដេញថ្លៃនៅក្នុង Online ឬទៅកន្លែងទេ -មានឡាន៣០០ ក្នុងមួយសប្តាហ៍
-Inter State Auto Auction, Salem NH ដែលនៅចម្ងាយ២០នាទីពីក្រុងឡូវែល អ្នកណាក៏អាចចូលរួមបានដែរ !
-នៅថ្ងៃសៅរ៍ ម៉ោង១០:០០ព្រឹក លោកអ្នកអាចបញ្ចេះឡាន/ការសម្តែងឡានមុនម៉ោង៩ព្រឹក
-ថ្ងៃពុធនៅវេលាម៉ោង៥:៣០នាទីល្ងាច : លោកអ្នកអាចបើកឡានសាកល្បងពីរម៉ោង៩ព្រឹកដល់ម៉ោង៥ល្ងាច

ANGKOR AUTO SERVICE,INC.
ហាងជួសជុលរថយន្ត "អង្គរ"
Free Estimate
Auto Body and Maintenance
BODY WORKS
Auto glass and windshields
Auto Frame Straightening and Painting
មានបទពិសោធន៍២០ឆ្នាំ ជាជាងរថយន្តមានសញ្ញាប័ត្រវាយតម្លៃការងារដោយឥតយកថ្លៃ ហើយយើងជួយសន្សំប្រាក់តម្លៃបន្ថយរបស់អិនស្ទួរិនបានផង យើងផ្តល់សេវាគ្រប់យ៉ាង :
ENGINE AND TRANSIMISSION SERVICES
State Inspection
Check Engine Light Diagnostic
Timing Belt Services
Complete Tune Up:
-Brake -Muffler -Struts
-Water Pump -A/C
-Bearing Services
From the moment you get into car accident, we will take care of you from towing to calling your insurance, and to get a rental car for you. With Angkor Auto, you can be worried free.
4835 N. 16th Street. Philadelphia, PA 19141
Tel : (215) 455-7810 / Ricky : (215) 485-1425

# សក្កទេវរាជបិនឡាដិន!

គឹម កៀន

រឿងរាល់យប់មុនពេលចូលគេង ខ្ញុំតែងតែបន់ស្រន់សូមឱ្យអស់លោកទេវតាលោកជួយឱ្យត្រូវឆ្នោតលេខធំបានម្តង ដើម្បីខ្ញុំធ្វើអំពើបុណ្យកុសលឱ្យបាន២យ៉ាងធំៗ មុននឹងខ្ញុំលាចាកលោកនេះទៅ ។ ទីមួយខ្ញុំចង់ជួយអង្គការសហព័ន្ធខ្មែរកម្ពុជាក្រោមឱ្យសម្រេចគោលដៅដោយជោគជ័យយ៉ាងឆាប់រហ័សបំផុត ព្រោះវៀមច្បងជាច្រើនរូប បានលះបង់ពេលវេលាទ្រព្យសម្បត្តិនឹងកម្លាំងកាយចិត្តរបស់ខ្លួន ដើម្បីបុព្វហេតុដ៏ឧត្តមនេះ ។ ការងារទាំងអស់នេះ ត្រូវកា៤ជាការចាំបាច់បំផុត ដើម្បីជំរុញនឹងទ្រទ្រង់ អ្នកអត្តមត្តទេសក៏នឹងអ្នកបំរើការងារដោយស្ម័គ្រចិត្តចំពោះមាតុភូមិខ្លួន ។ មិនមែន៤ជាអ្នកដឹកនាំក៏ពីតមែនហើយ តែយើងត្រូវការវាជាចំបាច់បំផុតសម្រាប់ធ្វើជាខ្ញុំបំរើយ៉ាងស្មោះត្រង់សម្រាប់អនុវត្តកិច្ចការណ៍ងារទាំងឡាយ ដូចពាក្យថា"ធ្វើស្រែនឹងទឹកធ្វើសឹកនឹងបាយ" ។ ទី២ខ្ញុំចង់ជួយសារពត៌មានខ្មែរប៉ុស្តិ៍ឱ្យមានមធ្យោបាយគ្រប់គ្រាន់ ដើម្បីជំរុញឱ្យអង្គការនេះបានរឹងជំហរជ្រោងទង់ភាពសាមគ្គីរវាងបងប្អូនខ្មែរ គ្រប់និន្នាការ.រក្សាការពារអក្សរសាស្ត្រ វប្បធម៌ជាតិឱ្យបានគង់វង់នៅក្រៅមាតុភូមិរបស់ខ្លួន ។ សង្ឃឹមទៅលើអ្នកជាវកាសែតនឹងអ្នកពាណិជ្ជករផ្សាយពាណិជ្ជកម្មឃើញថាសំណាងរីកចំរើនបានតិចតួចណាស់ អ្នកជំនួញខ្មែរមានតិចតួចពេក ឯអ្នកទិញ.អានសារព័ត៌មានខ្មែរមើលទៅកាន់តែតិចតួចមែនទែន បើប្រៀបធៀបជាមួយជនជាតិផ្សេងៗ ដែលភៀសខ្លួនពីតំបន់ជិតខាងគ្នាមករស់នៅជ្រកកោននៅទីនេះជាមួយគ្នា ។ បើអ្នកសរសេរវិញវាតិចហួសនិស្ស័យតិច មានច្រើនតែអ្នកចាំតិះតៀនមិនល្អអញ្ចេះមិនល្អអញ្ចុះមិនព្រមយកគំនិតល្អៗវិជ្ជាខ្ពស់ៗរបស់ខ្លួន មកជួយសហគមហ៍ខ្លួនឱ្យបានជឿនលឿនកុំឱ្យចាញ់សហគមន៍គេឆាយពេក ។ នៅឯមាតុភូមិចាញ់គេហើញភៀសខ្លួនមកទីនេះ សុំមេត្តាខំពូតដៃជួយគ្នាឱ្យបានប្រសើរជាងមុន កុំឱ្យដូចដែលយើងធ្លាប់ឃើញថាអ្នកចេះដឹងរបស់យើងចេះតែស៊ីញ៉ៅមួយមុខប៉ុណ្ណោះ ។ ហ្នឹងហើយដែលយើងមិនចូលចិត្តទាំងអស់គ្នា ហើយខំជៀសឱ្យឆ្ងាយដើម្បីមកកសាងសង្គមខ្មែរមួយប្រសើរជាង ។ ឥឡូវមានបងប្អូនអ្នកចេះដឹងខ្លះចេះតែចង់រត់ទៅស្រុកវិញ មិនដឹងចង់រត់ទៅកសាងស្រុកទេសឱ្យបានល្អជាង ឬក៏ចង់ទៅរួមចំណែកស៊ីញ៉ៅនឹងគេដែរ? នៅជួយសហគមន៍នេះ ហើយសហគម៍នេះកំពុងត្រូវការជួយច្រើនជាងទីណាទាំងអស់ ។ កំពុងតែមមៃគិតគ្មានគល់គ្មានចុងខ្ញុំមានអារម្មណ៍ហាក់ដូចសត្វល្អិតដូចចង្រិត. កណ្តូបឃំទ្រហឹងពេញតែត្រចៀកខ្ញុំ ហើយខ្ញុំហាក់ដូចអណ្តែតឡើងយ៉ាងលឿនខ្ញុំហោះ! អូ!ខ្ញុំហោះហើយចុះចតនៅនៅលើឋានមួយខ្ញុំមិនដែលស្គាល់សោះ ។ ខ្ញុំបានជួបទេវតាជាអ្នកយាមទ្វារ នាំទៅជួបស្តេចទេវតាហៅថាសក្កទេវរាជ គាត់ប្រាប់ខ្ញុំថា:"នោះ!សូមថ្វាយបង្គំព្រះអង្គទៅព្រះអង្គជាសក្កទេវរាជ ជាស្តេចនៃអស់ទេវតាទាំងឡាយ ។ ខ្ញុំលុតជង្គង់ចុះថ្វាយបង្គំយ៉ាងមហាគោរព ។ ព្រះអង្គមិនខ្ចីបើកព្រះនេត្រមិនដឹងលោកបានជ្រាបថា ខ្ញុំនាំសារមកថ្វាយព្រះអង្គឬទេ ។ ទេវតាអ្នកនាំផ្លូវ កេះខ្នងខ្ញុំឱ្យទៅមុខទៀត ។ ដើរបានតែប៉ុន្មានជំហ៊ាន ទេវតាអ្នកនាំផ្លូវកេះប្រាប់ទៀត:"សក្កទេវរាជខាងឈើឆ្កាង" ព្រះអង្គទ្រង់ញញឹមតែពុំស្តីអ្វីឡើយ ។ ដើរមួយសន្ទុះទេវតាអ្នកនាំផ្លូវកេះខ្នងខ្ញុំម្តងទៀត:" សក្កទេ-វរាជខាងស្តេចប្រេងកាត ចង់សុំអីសុំទៅព្រះអង្គមិនខ្លាចអីនឹងឱ្យទេ ។" ចំឡែកមែនម្តងនេះ ព្រះអង្គមិនគ្រាន់តែញញឹមរីករាយប៉ុណ្ណោះទេ ព្រះអង្គថែមទាំងចុះពីអាសនៈអសៃយណា មកទទួលខ្ញុំដោយរីករាយ:"សួស្តីៗអ្នកពីតជាចង់បានលុយ៤ ទៅកសាងសង្គមមែនទេ? ។ ខ្ញុំផ្ទាក់ផ្អើលស្ញើចសរសើរព្រះអង្គដោយបានឆ្វេងយល់ពីគោលបំណងរបស់ខ្ញុំជាស្រេចទៅហើយ ។ ព្រះអង្គហុចដៃមកចាប់ដៃខ្ញុំរលាក់យ៉ាងស្និទ្ធស្នាល ខ្ញុំរភើបពេកចង់លុតជង្គង់ចុះសម្តែងក្តីដឹងគុណ ព្រះអង្គទាញដៃខ្ញុំឡើងយ៉ាងរីករាយ:" មិនបាច់ទេៗបួនដប់លាន៤ មានចាំបាច់ដឹងគុណស្រែអីទេ ។ ខ្ញុំសំឡឹងព្រះអង្គដោយគោរពដឹងគុណ តែនៅមិនទាន់ទុកចិត្តមែនទែន ។ យល់ពីជំរៅចិត្តរបស់ខ្ញុំ ព្រះអង្គហុចថង់យាមមួយយ៉ាងធំ មកឱ្យខ្ញុំ ហើយទ្រង់មានបន្ទូលយ៉ាងរីករាយថា:" បើកមើល៍ប៉ុណ្ណឹងសមចិត្តឬនៅ?" ។ ខ្ញុំលាថង់យាមទាញចេញមកបានកាំភ្លើងខ្លីយ៉ាងស្អាតដល់ទៅពីរដើម ដែលខ្ញុំធ្លាប់តែឃើញ"អាយ៉ាងហ្វូ"សៀតចង្កេះយ៉ាងសង្ហាក្នុងរឿងក្មេងគង្វៀលគោ" ញី "Cowboy" ដែលខ្ញុំធ្លាប់តែចូលចិត្តតាំងពីដើមមកនោះ ។ តែម្តងនេះ សុំទោសចុះមិនហ៊ានទទួលទេព្រះអង្គអើយ! ។ ឃើញខ្ញុំងឿងឆ្ងល់ សម្លឹងព្រះអង្គភ្លឹះៗនោះ ទើបព្រះអង្គញញឹមដោយរីករាយ:" គេថា គេសុខចិត្តឱ្យត្រីគេមិនឱ្យសន្ទូច ឬមងទេព្រោះឱ្យត្រី.ស៊ីតែម្តងពីរដងអស់ហើយអ្នកត្រូវរត់ទៅពឹងគេទៀត ខ្ញុំចិត្តទូលាយជាងពួកនោះៗ ខ្ញុំសុខចិត្តបង្ហាញព្រៃឱ្យអ្នកតែមិនចង់ឱ្យសាច់១ដុំ២ ឬពាគីឡូឱ្យអ្នកទេ. ស៊ីបានប៉ុន្មានថ្ងៃវាអស់ហើយ យកកាំភ្លើងខ្លី២ដើមនេះទៅ

**តទៅលេខក្រោយ**

សិក្ខាសាលាស្តីពីការទិញផ្ទះលើកទី១
•សូមអញ្ជើញចូលរួមជាមួយយើង ដើម្បីរៀបចំទិញផ្ទះទី១របស់លោកអ្នក
•មានការបើកបង្រៀនរបៀបទិញផ្ទះពីរដង៍ក្នុង៍១ខែ យើង៍នឹង៍បង្រៀនលោកអ្នករៀបចំឲ្យចេញពី Credit មិនល្អ ឬគ្មាន Credit ឲ្យមានCredit ល្អវិញ ដើម្បីទៅរកថវិការស្នើសុំខ្ចីប្រាក់ទិញផ្ទះ យើង៍និយាយភាសាខ្មែរ ហើយផ្តល់សេវាដោយឥតគិតថ្លៃ បើលោកអ្នកមានបញ្ហាត្រូវគេរឹបអូសយកផ្ទះយើង៍ក៏អាចជួយបានដែរ -បើចង់ដឹង៍ព័ត៌មានពីការទិញផ្ទះនេះបន្ថែម សូមទូរស័ព្ទរកដេវីដ សេង៍ ថ្ងៃនេះ 215-467-8700 លេខបន្ត x 219
•ថ្នាក់បើកបង្រៀនមានដូចខាងក្រោមនេះ:
-ថ្ងៃអង្គារ៍ ៣១ មករា ២០១២ ពីម៉ោង ៥:៣០ដល់៩:៣០ ល្ងាច
-ថ្ងៃព្រហស្បត្តិ៍ ១៦ កុម្ភៈ ២០១២ ពីម៉ោង ៥:៣០ ដល់៩:៣០ល្ងាច
-ថ្ងៃអង្គារ៍ ២៨ កុម្ភៈ ២០១២ ពីម៉ោង ៥:៣០ ដល់ ៩:៣០ ល្ងាច
-ថ្ងៃព្រហស្បត្តិ៍ ១៥ មិនា ២០១២ ពីម៉ោង ៥:៣០ដល់៩:៣០ល្ងាច
-ថ្ងៃអង្គារ៍ ២៧មិនា ២០១២ ពីម៉ោង ៥:៣០ ដល់៩:៣០ល្ងាច
ព័ត៌មានបន្ថែមស្តីពីសិក្ខាសាលាសូមទូរស័ព្ទទៅ 215-467-8700 លេខបន្ត x 220
United Communities of Southeast Philadelphia
2029 s. 8 TH Street. (8th & Snyder Ave) Philadelphia, PA 19148
Tel. 215 -467-8700 ext. 220 Fax: 215 -467-1042 www.ucsep.org
United Communities Southeast Philadelphia

Employment
PK PROPERTY , INC. IS HIRING EXPERIENCED REAL ESTATE SALES PERSON.
PLEASE CONTACT: 215 668 1666 FOR DETAILS.
ជ្រើសរើសអ្នកធ្វើការ ដែលមានបទពិសោធន៍ ទិញលក់ដី និងផ្ទះ
"ភខេប្របធី អ៊ឹង" ទូរស័ព្ទលេខ ២១៥ ៦៦៨ ១៦៦៦

# East Coast Center

for Plastic & Laser Surgery

Mai Ngoc Tran, M.S., Skin Care Specialist
Joseph A. Russo, M.D. F.A.C.S
Plastic & Reconstructive Surgeon
www.eastcoastsurgery.com


Skin Care Products


Tummy Tuck


Breast Lift


Beast Enlargement


Nose Surgery


Eyelid Surgery


Face Lift


Dermabrasion

ហាងកែសម្ផស្សយើងខ្ញុំមានទទួលកែសម្ផស្ស បុរស_ស្ត្រី ដែលមាន
អាការៈដូចជា: ខ្លាញ់ក្បាលពោះ ពង្រីកសុដន់ឲ្យធំ កែខ្នង់ច្រមុះ
កែត្របកភ្នែក កែមុខស្រស់ស្អាត...។ល។ និង។ល។
និងមានលក់ឧបករណ៍កែសម្ផស្សផ្សេងៗជាច្រើនទៀត

381 West Broadway South Boston, MA 02127
(617) 464 - 0001



# ក្រុមហ៊ុនទេសចរណ៍ ភ្នំពេញអន្តរជាតិ

## Phnom Penh International Travel Services

21 Branch St., Ste #1
Lowell, MA 01851
Tell: 978-970-5999
Fax: 978-970-5599

109 Lafayette St. #C-5
New York, NY 10001
Tell: 212-219-2299
Fax: 212-219-9930

- លក់សំបុត្រយន្តហោះសម្រាប់ក្នុង និងក្រៅប្រទេស
- ធ្វើលិខិតធានា ប្តី ប្រពន្ធ ឬគូដណ្តឹងពីស្រុកខ្មែរ
- ធ្វើលិខិតសុំច្បាប់ចេញចូល -Re-Entry Permit
- ពន្យា Passport ខ្មែរ Laisser Passer
- ធ្វើទិដ្ឋាការ Visa ទៅអាស៊ី
- ធ្វើលិខិតសុំ Green Card I-94 Work Permit
- បំពេញសុំចូលសញ្ជាតិ
- ថតរូបសម្រាប់ចូលសញ្ជាតិ និងទទួលផ្ញើប្រាក់ទៅស្រុកខ្មែរគ្រប់ប្រទេស
- លក់ Money Order និងបោះត្រា Nortary Public




978-970-5999



# GATEWAY FAMILY DENTAL

NOW OPENED AT GATEWAY CENTER II (978) 455-5044

151 WARREN STREET, SUITE 120 LOWELL, MA 01852 (Same building as Social Security/near the courthouse)



### DR. SERENA B. CHUOP

Dr. Serena B. Chuop was born in Cambodia. She received her Bachelor of Science from Boston University and went on to graduate from Boston University Goldman School of Dental Medicine in the year 2000. For over 10 years, she has been in private practices providing all aspects of General Dentistry. Dr. Chuop has opened a brand new state of the art dental practice that includes digital x-ray, paperless patient chart system, and brand new dental equipments.




**WE PROVIDE ALL SERVICES INCLUDING:**

- CLEANING
- FILLINGS
- BONDINGS
- COSMETIC DENTISTRY
- CROWNS/BRIDGES
- DENTURES
- IMPLANTS
- EXTRACTIONS
- TEETH WHITENING
- VENEERS
- EMERGENCY DENTAL TREATMENT
- ROOT CANAL TREATMENT
- DENTAL SERVICES TO CHILDREN

**យើងផ្តល់នូវសេវាដូចខាងក្រោមនេះ**

- សំអាតធ្មេញ
- បំពេញធ្មេញប្រហោង
- ថ្នាំសំរាប់ការពារធ្មេញ
- ធ្មេញពាក់ជំនួសធ្មេញដែលបាក់
- ក្រាសធ្មេញពាក់
- ដាំធ្មេញតាមរន្ធធ្មេញចាស់
- ដកធ្មេញ
- ធ្វើធ្មេញឱ្យសស្អាត
- វែរនីស្រោបធ្មេញ
- ព្យាបាល និងការពារធ្មេញជាទៀងទាត់
- ព្យាបាល ឫសថ្គាមធ្មេញ
- សេវាព្យាបាលសំរាប់កុមារ

MOST DENTAL INSURANCES ACCEPTED
INCLUDING MASSHEALTH FOR KIDS
FINANCING AVALIABLE
យើងទទួលនូវគ្រប់ អ៊ិន ស៊ូរិន
Masshealth for Kids
យើងសំរួលការបង់ថ្លៃព្យាបាលប្រចាំខែ
CALL FOR YOUR FREE CONSULTATION
(978) 455-5044

www.gatewayfamilydental.com

ឌឹ ខេមបូឌា ដេលី The Cambodia Daily

ដំណឹងប្រែសម្រួលពីកាសារអង់គ្លេស អត្ថបទដកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌឹ ខេមបូឌា ដេលី ច្បាប់ចេញផ្សាយថ្ងៃសុក្រ ទី១៧ ខែកុម្ភៈ ឆ្នាំ២០១២

## ក្រុមសិទ្ធិមនុស្ស : នគរបាលប្រព្រឹត្តខុសក្នុងការឆ្មក់ចូលកន្លែងម៉ាស្សា

**ដោយ : គុជ ណារ៉េន និង KATE BARTLE TT**
**ខេមបូឌា ដេលី**

អង្គការក្រៅរដ្ឋាភិបាលក្នុងស្រុកមួយបានកាលពីម្សិលមិញថា ពេលកំពុងអនុវត្តប្រតិបត្តិការប្រមូលចាប់ស្ត្រីរកស៊ីផ្លូវភេទបានជាង៣០០នាក់ ក្នុងរាជធានីភ្នំពេញ កាលពីឆ្នាំមុននោះ ជារឿយៗនគរបាលបានបន្លំខ្លួនជាជនស៊ីវិល និងធ្វើជាអ្នកហៅស្ត្រីទាំងនោះទៅរួមភេទ ។

សាលារាជធានីភ្នំពេញបានបញ្ជាក់ក្នុងរបាយការណ៍ប្រចាំឆ្នាំរបស់ខ្លួនចេញផ្សាយកាលពីថ្ងៃច័ន្ទថា ក្នុងឆ្នាំ២០១១កន្លងមកនេះ អាជ្ញាធរប្រមូលចាប់ស្ត្រីរកស៊ីផ្លូវភេទបានចំនួន៣២៦នាក់បញ្ជូនទៅអង្គការក្រៅរដ្ឋាភិបាលក្នុងស្រុក "ដើម្បីធ្វើការអប់រំ" ។ ប៉ុន្តែអង្គការបណ្តាញស្ត្រីរួបរួមគ្នា (WNU) ដែលធ្វើការជាមួយស្ត្រីរកស៊ីផ្លូវភេទ និងបានទទួលយកស្ត្រីរកផ្លូវភេទមួយចំនួនក្នុងចំណោមស្ត្រីរកស៊ីផ្លូវភេទ ដែលអាជ្ញាធរប្រមូលបានទាំងអស់នោះ បានបញ្ជាក់ថា ខ្លួនបានទទួលពាក្យបណ្តឹងជាង១០០ពីស្ត្រីរកស៊ីផ្លូវភេទ ដែលបានប្តឹងនគរបាលពីបទប្រព្រឹត្តមិនត្រឹមត្រូវពេលកំពុងធ្វើប្រតិបត្តិការប្រមូលចាប់នោះ ។

លោកស្រី កែវ ថា អ្នកសម្របសម្រួលនៅអង្គការបណ្តាញការងារស្ត្រីរួបរួមគ្នាបាននិយាយថា ភាគីច្រើនក្នុងចំណោមស្ត្រីរកស៊ីផ្លូវភេទទាំងនោះប្តឹងថា នៅពេលកំពុងធ្វើប្រតិបត្តិការប្រមូលចាប់ស្ត្រីរកស៊ីផ្លូវភេទនៅតាមកន្លែងម៉ាស្សានោះ ក្រុមមន្ត្រីនគរបាលស្លៀកពាក់ស៊ីវិល ហើយហៅស្ត្រីទាំងនោះចូលក្នុងបន្ទប់ ដើម្បីរួមភេទមុនពេលនគរបាលចាប់ប្រតិបត្តិការឆ្មក់ចូលចាប់ ។

លោកស្រី ស៊ីថា បាននិយាយថា "ដើម្បីទទួលបានការកោតសសើរ និងការទទួលស្គាល់ស្នាដៃការងារពីថ្នាក់លើនោះ មន្ត្រីនគរបាលបន្លំខ្លួនជាជនស៊ីវិល ហើយចូលទៅក្នុងកន្លែងម៉ាស្សា ដើម្បីកោសខ្យល់ ឬធ្វើសរសៃ ។ បន្ទាប់មកពួកបានបញ្ឆោតស្ត្រីៗឱ្យចូលទៅរួមភេទជាមួយដោយសន្យាឱ្យលុយ១០ដុល្លារ" ។

លោកស្រី ថា បន្ថែមថា "ពួកគេបានដេកជាមួយស្ត្រីទាំងនោះ ហើយបន្ទាប់ពីរួមភេទរួចហើយ ពួកគេបានទាក់ទងទៅនគរបាលមួយក្រុមផ្សេងទៀត ឱ្យមកឆ្មក់ចូលកន្លែងម៉ាស្សា ដើម្បីចាប់ស្ត្រីទាំងនោះ និងម្ចាស់កន្លែងម៉ាស្សា" ។

លោក កែវ ធា នាយការិយាល័យនគរបាលប្រឆាំងការជួញដូរមនុស្ស និងការពារអនីតិជនរាជធានីភ្នំពេញ បានបដិសេធការចោទប្រកាន់ទាំងនេះ ដោយមានប្រសាសន៍ថា ជួនកាលនគរបាលឆ្មក់ចូលកន្លែងម៉ាស្សាស្ងាត់ៗតែម្តង ប៉ុន្តែលោកថា ពួកគេមិនដែលដេកជាមួយស្ត្រីទាំងនោះទេ។

លោក កែវ ធា បានមានប្រសាសន៍ថា "នគរបាលមិនដែលប្រើល្បិចថោកទាបសោះឡើយ ។ យើងតែងតែប្រមូលភស្តុតាងបានគ្រប់គ្រាន់ ដើម្បីបង្ហាញព្រះរាជអាជ្ញាមុនពេលយើងទទួលបានការយល់ព្រមឱ្យធ្វើប្រតិបត្តិការឆ្មក់ចាប់" ។

ចាប់តាំងពីមានការអនុវត្តច្បាប់ស្តីពីការទប់ស្កាត់ការជួញដូរមនុស្ស និងការកេងប្រវ័ញ្ចផ្លូវភេទ កាលពីឆ្នាំ២០០៨ ដែលច្បាប់នេះបានចែងយ៉ាងតឹងរ៉ឹងលើគ្រប់ផ្នែកទាំងអស់តាំងពីការទិញដូរផ្លូវភេទដល់ការធ្វើសញ្ចកម្មនោះក្រុមអង្គការនានា ដែលធ្វើការតស៊ូមតិដើម្បីសិទ្ធិស្ត្រីបានអះអាងថា ស្ត្រីរកស៊ីផ្លូវភេទត្រូវបានគេបង្ខំឱ្យលាក់ខ្លួន ហើយពួកគេរស់នៅគ្មានសុវត្ថិភាពឡើយ ។

យោងតាមច្បាប់នោះ ជនណាបើកកន្លែងពេស្យាចារ ឬអនុញ្ញាតឱ្យមានអំពើពេស្យាចារកើតមានក្នុងបរិវេណរបស់ខ្លួននោះអាចមានទោសជាប់ពន្ធនាគាររហូតដល់៥ឆ្នាំ។

លោក សុក សំអឿន នាយកប្រតិបត្តិក្រុមអ្នកច្បាប់ការពារសិទ្ធិកម្ពុជា ដែលផ្តល់ការគាំទ្រផ្នែកច្បាប់ដល់ជនក្រីក្រ និងជនងាយរងគ្រោះបានមានប្រសាសន៍ថា នគរបាលបានប្រើប្រាស់វិធីក្លែងខ្លួនក្នុងការធ្វើប្រតិបត្តិការ ប៉ុន្តែលោកបានឱ្យដឹងថា ពួកគេមិនមានគោលដៅលើស្ត្រីរកស៊ីផ្លូវភេទនោះទេ គឺពួកគេសំដៅលើម្ចាស់កន្លែងម៉ាស្សាតែម្តង៕ **ប្រែសម្រួលដោយ កង សុធា**

## អ្នកច្បាប់និយាយថា លោកស្រី មូរ សុខហួរ ត្រូវបានប្តឹងពីបទជួយឱ្យគេគេចខ្លួន

**ដោយ : គុជ ណារ៉េន**
**ខេមបូឌា ដេលី**


លោកស្រី មូរ សុខហួរ

សមាជិកសភាមកពីគណបក្ស សម រង្ស៊ី លោកស្រី មូរ សុខហួរ បានមានប្រសាសន៍កាលពីម្សិលមិញថា លោកស្រីត្រូវបានមណ្ឌលសង្គមកិច្ចព្រៃស្ពឺ រាជធានីភ្នំពេញប្តឹងពីបទជួយឱ្យស្ត្រី និងកុមារ១៨នាក់ បានគេចខ្លួនកាលពីខែមុន ដែលត្រូវបានអាជ្ញាធរចាប់ឃុំខ្លួន នៅទីនោះផ្ទុយនឹងឆន្ទៈរបស់ខ្លួនអស់រយៈពេលជាងមួយសប្តាហ៍ ។

លោកស្រី សុខហួរ មានប្រសាសន៍ថា លោកស្រីត្រូវបានព្រះរាជអាជ្ញារង លោក សុខ រឿន ជូនដំណឹងកាលពីម្សិលមិញថា មេធាវីតំណាងឱ្យមជ្ឈមណ្ឌលបានដាក់ពាក្យបណ្តឹងប្តឹងលោកស្រីនៅដើមសប្តាហ៍នេះ។ លោកស្រីថ្លែងថា "មានគេប្រាប់ខ្ញុំពីរឿងនេះបន្ទាប់ពីមានគេប្តឹងទៅសាលាដំបូងរាជធានីភ្នំពេញ" ។ ប៉ុន្តែលោកស្រីបានបដិសេធមិនបរិយាយឱ្យល្អិតល្អន់ ។ អភ័យឯកសិទ្ធិសភារបស់លោកស្រី មូរ សុខហួរ ត្រូវបានដកនៅក្នុងឆ្នាំ២០០៩ ហើយពុំទាន់បានផ្តល់ឱ្យលោកស្រីវិញនៅឡើយទេ ដែលអាចផ្តល់ឱកាស ដល់ការផ្តន្ទាទោសចំពោះលោកស្រី។

លោក សុករឿន មិនអាចទាក់ទងសុំការអត្ថាធិប្បាយបានទេកាលពីម្សិលមិញនេះ ។ ក្រឡាបញ្ជីតុលាការម្នាក់ក្នុងចំណោមក្រឡាបញ្ជី និងព្រះរាជអាជ្ញាបាននិយាយថា ពួកគេពុំបានដឹងអំពីរឿងក្តីនោះទេ ។

មន្ត្រីរបស់មណ្ឌលសង្គមកិច្ចរាជធានីភ្នំពេញមួយចំនួន ដែលគេស្គាល់ឈ្មោះថា មណ្ឌលព្រៃស្ពឺនោះ ពុំអាចទំនាក់ទំនងសុំធ្វើអត្ថាធិប្បាយបានទេ។

លោក សាន សុផល ប្រធានមន្ទីរសង្គមកិច្ចរាជធានីភ្នំពេញ ដែលអ្នកគ្រប់គ្រងមណ្ឌលនេះ បានមានប្រសាសន៍ថា លោកពុំបានដឹងអំពីរឿងក្តីនេះទេ ។ លោកបានមានប្រសាសន៍ថា "ខ្ញុំពុំបានដឹងអំពីរឿងនេះទេ ពីព្រោះមន្ទីរពុំបានដាក់ពាក្យបណ្តឹង ប្តឹងលោកស្រី មូរ សុខហួរ ទេ" ។

និយាយពីរឿងក្តីមួយនេះ បានបង្កឱ្យមានកង្វល់រួចទៅហើយ ក្នុងចំណោមអង្គការសិទ្ធិមនុស្សទាំងឡាយ ដែលបានបញ្ជាក់ថា លោកស្រី មូរ សុខហួរ ពុំបានប្រព្រឹត្តអ្វីផ្ទុយនឹងច្បាប់ឡើយ ហើយបាននិយាយថា ពួកគេមានការព្រួយបារម្ភថា ករណីនេះអាចមានជាហេតុផលប៉ះពាល់ជាអវិជ្ជមានដល់អង្គការសង្គមស៊ីវិលនានា ។

លោក សំ អាត ប្រធានផ្នែកបច្ចេកទេសរបស់អង្គការសិទ្ធិមនុស្សលីកាដូ បានមានប្រសាសន៍ថា "តាមខ្ញុំដឹងលោកស្រីពុំបានធ្វើអ្វីខុសច្បាប់ទេ" ។

លោក ចាន់ សុវ៉េត ជាអនុប្រធានផ្នែកអង្គការរបស់អង្គការសិទ្ធិមនុស្សអាដហុកបាននិយាយថា អង្គការរបស់លោកកំពុងតែឃ្លាំមើលរឿងក្តីនេះ។

លោកបានមានប្រសាសន៍ថា "យើងបានឮពីប្រភពជាច្រើនថា លោកស្រីត្រូវបានមណ្ឌលសង្គមកិច្ចរាជធានីភ្នំពេញប្តឹង" ។ លោកបានបន្ថែមថា "បើសិនរឿងនេះជាការពិតវាធ្វើឱ្យប៉ះពាល់ដល់សិទ្ធិរបស់សកម្មជនសិទ្ធិមនុស្ស ដែលគ្រាន់តែផ្តល់ប្រឹក្សាផ្នែកច្បាប់ និងសិទ្ធិមនុស្ស" ។

ការគេចខ្លួនបានកើតឡើងបន្ទាប់ពីលោកស្រី មូរ សុខ ហួរ និងលោក សុវណ្ណ ពិសាខា សមាជិកសភាមកពីគណបក្ស សម រង្ស៊ី បានប្រកាសទៅកាន់ស្ត្រីនោះថា ជាពួកគេកំពុងត្រូវគេឃុំខ្លួនដោយខុសច្បាប់ ព្រោះមិនទាន់មានការចោទប្រកាន់ពីតុលាការមកលើពួកគេទេ។

លោក សុវ៉េត បានបន្ថែមថា "សកម្មភាព របស់លោកស្រី ក្នុងការផ្តល់ប្រឹក្សាផ្នែកច្បាប់ ស្តីពីសិទ្ធិជាមូលដ្ឋានដល់អ្នកភូមិបុរីកីឡា គឺសកម្មភាពការពារសិទ្ធិមនុស្សហើយវាមិនខុសច្បាប់ទេ" ៕

## Rights Group Claims Polices Misconduct in Massage Parlor Raids

**By Kuch Naren And Kate Bartlett**
THE CAMBODIA DAILY

While rounding up more than 300 sex workers in Phnom Penh last year, police would often post as civilians and solicit sex from the women, a local NGO said yesterday.

In its annual report released Monday, City Hall said authorities had rounded up 326 sex workers and sent them to local NGOs for "re-education" in 2011. But the Women Network for Unity (WNU) which work with sex workers and received some of the rounded-up women said it had recorded more than 100 complaints from sex workers of police misconduct during the round-ups.

WNU coordinator Keo Tha said the majority of these sex workers had complained that during sting operations on massage parlors, police officers would dress as civilians and solicit sex from the women before conducting police raids.

"In order to receive praise and get credit from their superiors, police disguise as civilians and drop by massage parlors to get coined or massaged," said Ms. Tha. "Then they trick the girls into having sex by promising them $10."

"They sleep with the girls and, after havin sex, they contact another group of police to raid the massage parlor and apprehend the girls and parlor owners," Ms. Tha added.

Keo Thea, municipal anit-trafficking police chief, dismissed the allegations, saying police sometimes had to go under cover in order to raid massage parlors, but that they never slept with the women.

"Police never use dirty tricks," Mr. Thea said. "We always collect sufficient evidence to show the court prosecutor before we ge approval for the raid."

Since the implementation of the law on Suppression of Human Trafficking and Sexual Exploitation in 2008 which provided tougher legislation on everything from soliciting to procuring sex workers women´s advocacy groups have complained that sex workers have been pushed ever further underground and that their safety has been compromised.

Under the law, anyone who operates a prostitution establishment, or allows prostitution to take place on their premises, can go to jail for a maximum of five years.

Sok San Oeun, director of the Cambodian Defenders Project, which provides legal support to the poor and vulnerable, said he was aware of the police using undercover sting operations, but that they were not meant to target the sex workers themselves, but rather the massage parlor owners.

"If you are a owner of a massage shop, if you allow them to do that in your shop, you can be charged with a crime," Mr.Sam Oeun said, adding that police must have evidence to prove sex had occurred on the premises and that police have in the past been known to plant false evidence.

"Sometimes they [police] used condoms. Even if they have no sex with the girl, they put the condoms there," he said. "The police don´t send the condom to the lab to see if it´s used or not."

## Lawmaker Says She Was Sued for Aiding Escape

**By Kuch Naren**
THE CAMBODIA DAILY

SRP lawmaker Mu Sokhua said yesterday she has been sued by Phnom Penh´s Prey Speu Social Affairs Center for aiding last month the escape of 18 women and children who had been detained there against their will for more than a week.

Ms. Sokhua said she was informed yesterday by acting chief prosecutor Sok Roeun that lawyers for the center lodged a complaint against her earlier this week.

"I have been told the lawsuit has been lodged with Phnom Penh Municipal Court," she said, but declined to elaborate further. Ms. Sokhua´s parliamentary immunity was stripped in 2009 and has yet to be restored, leaving her open to prosecution.

Mr. Roeun could not be reached for comment yesterday. A number of court clerks and prosecutors said they were not familiar with the suit.

Officials at Phnom Penh Municipal Social Affairs Center, better known as Prey Speu, could not be reached for comment. San Sophal, director of the Phnom Penh Municipal Social Affairs Department, under which the center is registered, said he had no knowledge of the lawsuit.

"I don´t know about this because the department did´t file a suit [against her]," he said.

Talk of a lawsuit has already sparked concern among rights groups, which stressed Ms. Sokhua did nothing unlawful, and expressed worries that the case could have significant negative ramifications for advocacy organizations.

"From my knowledge, she has done nothing illegal before the law," said Am SamAth, technical supervisor for rights group Licadho.

Chan Soveth, deputy head of Adhoc´s monitoring program, said his organization is looking into the suit.

"We´ve heard from numerous sources that she has been sued by Phnom Penh Municipal Social Affairs Center," he said, adding: "If it were true, it would harm the rights of rights workers who just perform tasks providing legal advice and human rights."

The escape came shortly after Ms. Sokhua, along with SRP lawmaker Sovanna Pisakha, announced to the women that they were being held illegally, as no charges had been lodged against them.

"Her activities in giving legal advice on the fundamental rights to Borei Keila residents is an act of advocating for human rights. It should not be illegal," added Mr. Soveth.

ព្រះរាជាណាចក្រកម្ពុជា
ជាតិ សាសនា ព្រះមហាក្សត្រ
Kingdom of Cambodia
Nation Religion King
Royaume du Cambodge
Nation Religion Roi

អង្គជំនុំជម្រះវិសាមញ្ញក្នុងតុលាការកម្ពុជា
Extraordinary Chambers in the Courts of Cambodia
Chambres extraordinaires au sein des tribunaux cambodgiens


លោក ម៉ម យឹន

សំណុំរឿងលេខ: ០០២/១៩-០៩-២០០៧-អ.វ.ត.ក
លេខ: 0590/11ករសត
09-VU-00539

**លិខិតជូនដំណឹង**

**ផ្ញើចេញពីផ្នែកគាំពារជនរងគ្រោះ នៃអង្គជំនុំជម្រះវិសាមញ្ញក្នុងតុលាការកម្ពុជា**

សូមជម្រាបមកលោក ម៉ម យឹន ទីលំនៅសព្វថ្ងៃ348 E Roosevelt Boulevard Philadelphia, PA 19120, USA

យើងខ្ញុំសូមជម្រាបមក លោក-លោកស្រីទាក់ទងនឹងពាក្យបណ្តឹងដែលលោក-លោកស្រីបានដាក់ជូនមកអង្គជំនុំជម្រះវិសាមញ្ញក្នុងតុលាការកម្ពុជា(អ.វ.ត.ក)។ យើងខ្ញុំសូមអរគុណចំពោះលោក-លោកស្រី ដែលបានចំណាយពេលវេលា និង កំលាំងកាយកំលាំងចិត្តនៅក្នុងការដាក់ពាក្យបណ្តឹងរបស់លោក-លោកស្រី។

# លិខិតឆ្លើយតប

**ដោយឧត្តមសេនីយ៍ ម៉ម យឹន**

សូមជម្រាបមកសហព្រះរាជអាជ្ញានៃអង្គជំនុំជំរះវិសាមញ្ញក្នុងតុលាការកម្ពុជា នៅទីក្រុងភ្នំពេញ ព្រះរាជាណាចក្រកម្ពុជាជាទីមេត្រី ។

ថ្ងៃនេះខ្ញុំមានសេចក្តីសប្បាយរីករាយ ដោយបានទើបតែបានទទួលិខិតជូនដំណឹងមួយច្បាប់ ស្តីអំពីការបានយល់ព្រមទទួលពាក្យបណ្តឹងរបស់ខ្ញុំជាផ្លូវការ នៅក្នុងនាមខ្ញុំជាជនរងគ្រោះយ៉ាងសែនវេទនាខ្លោចផ្សានៅក្នុងអំពើមហាឧក្រិដ្ឋកម្មប្រល័យពូជសាសន៍ ប្រឆាំងនឹងមនុស្សជាតិខ្មែរ ឧក្រិដ្ឋកម្មសង្គ្រាម ដែលមេដឹកនាំខ្មែរក្រហមកម្ពុជាប្រជាធិបតេយ្យ មានសម្តេចប្រមុខរដ្ឋសីហនុ ប្រធានគណប្រធានរដ្ឋ ខៀវ សំផន និងប្រធានបក្សប្រជាជនបដិវត្តន៏កម្ពុជា ប៉ុល ពត ជាមេដឹកនាំកំពូលពីឆ្នាំ១៩៧៥ ដល់ឆ្នាំ១៩៧៩ ។

ក្រោយពីខ្ញុំបានអាន ដោយពិនិត្យផ្ទៀងផ្ទាត់ជាច្រើនដង ដើម្បីឱ្យបានយល់ច្បាស់ពិតប្រាកដ អំពីអត្ថន័យ និងខ្លឹមសាររបស់អង្គជំនុំជំរះវិសាមញ្ញក្នុងតុលាការកម្ពុជា ដែលកំពុងតែដំណើរការចាប់តាំងពីឆ្នាំ ២០០៦ មករហូតមកដល់សព្វថ្ងៃ ។

សូមជម្រាបថា រូបខ្ញុំផ្ទាល់ ក៏ដូចជាបងប្អូនរួមឈាមជាតិខ្មែររាប់លាននាក់ ប្រមាណជិត៤លាននាក់ ដែលសុទ្ធតែជាជនរងគ្រោះជាក់ស្តែងនៅក្រោមអំណាចការគ្រប់គ្រងនៃក្រុមមេដឹកនាំខ្មែរក្រហមកម្ពុជា ប្រជាធិបតេយ្យ ដែលជាមេដឹកនាំកំពូល៣រូប ដូចមានរាយឈ្មោះខាងលើ ហើយនឹងនៅមានវរជនសំខាន់ជាច្រើនរូបទៀត ដែលកំពុងតែកាន់អំណាចសព្វ ថ្ងៃក៏ជាអតីតក្រុមមេខ្មែរក្រហមនេះដូចគ្នាដែរ គឺគ្រាន់តែដើរតួជាក្រុម១អ្នកសម្លាប់ និងក្រុម១ជាអ្នក ជួយសង្គ្រោះជីវិតតែប៉ុណ្ណោះ ។

រូបខ្ញុំជាអតីតសាស្ត្រាចារ្យបច្ចេកទេស បង្រៀននៅសកលវិទ្យាល័យខេត្តកំពង់ចាម និងជាអតីតនាយទាហ៊ានជាន់ខ្ពស់ថ្នាក់ឧត្តមសេនីយ៍ នៃកងទ័ពជាតិខ្មែរស្នេហាជាតិ ។

នៅពេលខ្ញុំបានដឹងថា អង្គការសហប្រជាជាតិបានរៀបចំផែនការបង្កើតតុលាការពិសេសអន្តរជាតិមួយសម្រាប់ជំនុំជំរះកាត់ទោសមេដឹកនាំខ្មែរក្រហមកំពូលតាមពាក្យស្នើសុំរបស់នាយករដ្ឋមន្ត្រី ហ៊ុន សែន សូម អ.ស.ប ជួយបង្កើតតុលាការអន្តរជាតិពិសេស ដែលមានលំនាំដូចគ្នានៅប្រទេសអៀរ៉ាក់ ប្រទេសយូហ្គោស្លាវីជាដើម ខ្ញុំមានសេចក្តីសប្បាយរីករាយ ពេញចិត្តនឹងអាចនាំយកមេដឹកនាំកំពូលខ្មែរក្រហម មកជំនុំជំរះកាត់ទោស ដោយស្វែងរកឱ្យឃើញការពិត និងដំណើរការជំនុំជំរះកាត់ទោសទៅតាមគតិយុត្តិធមិ ល្អត្រឹមត្រូវបំផុត ។ ដើម្បីឱ្យបណ្តាជនរងគ្រោះសល់ពីស្លាប់ទាំងអស់ បានរសាយទុក្ខសោក គ្រៀមក្រំ និងបានស្ងប់សុខសាន្តក្នុងសតិអារម្មណ៍ក្នុងចិត្ត ដែលបានបៀមជាប់ជានិច្ចនូវសេចក្តីរងទុក្ខវេទនាខ្លោចផ្សាពីការព្រាត់ប្រាស់បាត់បង់ ឪពុកម្តាយ ជីតាជីដូន កូនចៅ ប្តីប្រពន្ធ ញាតិសណ្តានសាច់សារលោហិត និងមិត្តភ័ក្រ្តជាទីស្រឡាញ់អស់ពីដួងចិត្តរបស់ខ្លួន នៅពេលបានឃើញតុលាការពិសេសនេះ បានផ្តល់យុត្តិធមិពិតប្រាកដដល់ខ្លួននោះ ។

រយៈពេលជាច្រើនឆ្នាំកន្លងទៅ ការចំណាយថវិការបស់អ.ស.ប អស់ជាង២០០លានដុល្លារ ទៅលើសហព្រះរាជអាជ្ញា និងសហចៅក្រមជាជនជាតិខ្មែរ និងជាតិសាសន៍នានា ដែលអ.ស.ប បានតែងតាំឱ្យមកចូលរួមសហការណ៏គ្នា បង្កើតជាអង្គជំនុំជំរះវិសាមញ្ញក្នុងតុលាការកម្ពុជា ដែលតាមធម្មតាអង្គការ តុលាការនៅក្នុងប្រទេសណាក៏ដោយ ត្រូវជាអង្គការឯករាជ្យ មានអំណាចពេញទីនៅក្នុងក្របខ័ណ្ឌច្បាប់ ដែលមានចែងជានិតិរដ្ឋ និងធម្មនុញ្ញរបស់អ.ស.ប និងរដ្ឋធម្មនុញ្ញរបស់ប្រទេសនិមួយៗ ។ មានន័យថា មិនត្រូវឱ្យមានបុគ្គលដ៏មានអំណាច ទោះបីជាស្តេចក្តី ជាប្រធានាធិបតីក្តី ជានាយករដ្ឋមន្ត្រីក្តី ប្រើអំណាចចូលទៅជ្រៀតជ្រែកក្នុងអំណាចតុលាការ ដែលកំពុងតែស្វែងរកគតិយុត្តិធមិផ្តល់ឱ្យជនរងគ្រោះនេះបានឡើយ ។ វិទ្យាស្ថាន ASRIC នៅរដ្ឋកាលីហ្វនីញ៉ា ស.រ.អា និងមេធាវី របស់ខ្ញុំ ឈ្មោះកញ្ញា Andrea C, Evans ។

ក្នុងការបញ្ចេញមតិយល់ឃើញនៅក្នុងការកាត់ទោស ទៅលើមេដឹកនាំដែលបានប្រព្រឹត្តអំពើមហាឧក្រិដ្ឋកម្មកាប់សម្លាប់មនុស្សជាតិនេះថា ខ្ញុំពេញចិត្តចង់ឃើញតុលាការពិសេសកាត់ទោស ទៅលើតែរូបមេដឹកនាំកំពូលតែប៉ុណ្ណោះ ដូចជាគេបានធ្វើនៅក្នុងប្រទេសអៀរ៉ាក់ ប្រទេសយូហ្គោស្លាវី គឺគេកាត់ទោសទៅលើតែប្រធានាធិបតី សាដាំ ហ៊ូសេន និងមេឡូសេវិចរួចហើយតុលាការពិសេសនេះ ត្រូវបានរំលាយចោលទៅវិញ ។

ចំណែកមន្ត្រីសំខាន់ៗក្នុងជួររដ្ឋាភិបាលសាដាំ ត្រូវយកទៅកាត់ទោសក្នុងតុលាការធម្មតារបស់ប្រទេសនោះទៅវិញ ។

ជាពិសេសតុលាការពិសេសនោះ មិនត្រូវស្ថិតនៅក្រោមអំណាចឥទ្ធិពលនៃមេដឹកនាំថ្មី នៃរដ្ឋាភិបាលនោះសោះឡើយដែរ ដែលមានអំណាចចូលជ្រៀតជ្រែកនៅក្នុងកិច្ចការរបស់សហព្រះរាជអាជ្ញា និងសហចៅក្រមជំនុំជំរះកាត់សេចក្តីនោះ ។

នៅក្នុងតុលាការពិសេសអន្តរជាតិ ដែលមានសហព្រះរាជអាជ្ញា និងសហចៅក្រមក្នុងអង្គជំនុំជំរះវិសាមញ្ញ ក្នុងតុលាការកម្ពុជានេះ ខ្ញុំកត់សំគាល់ឃើញមានការចំឡែក ប្លែកខុសពីតុលាការពិសេស នៅប្រទេសដ៏ទៃ ដែលត្រូវកាត់ទោសមេដឹកនាំប្រទេសជាតិ បានប្រព្រឹត្តអំពើមហាឧក្រិដ្ឋកម្មដូចគ្នាដែរ បណ្តាលឱ្យរូបខ្ញុំពុំមានសេចក្តីសង្ឃឹមថា តុលាការនេះ នឹងអាចស្វែងរកគតិយុត្តិធមិពិតប្រាកដដល់ជនរងគ្រោះ នៅក្នុងរយៈពេលវេលាដ៏សមរម្យបានឡើយ ហើយនឹងត្រូវចំណាយថវិកាអស់ជាច្រើនរយលានដុល្លារ ដើម្បីបន្តការជំនុំជំរះកាត់សេចក្តីពីសំណុំរឿងក្នុងករណី០០១, ០០២, ០០៣, ០០៤ ។ល។ ម្នាក់ម្តងៗ ប្រហែលជាទំរាំធ្វើបានអ្នកត្រូវកាត់ទោសនឹងស្លាប់អស់ទៅហើយ នឹងអ្នកប្តឹងក៏ស្លាប់អស់ទៅក៏មិនដឹងរួចហើយតុលាការ ពិសេសនេះនៅតែមិនអាចកាត់ទោសមេកំពូលខ្មែរក្រហមនេះបានឡើយ ។

ក្រោយពីខ្ញុំបានអានលិខិតជូនដំណឹងនេះ ខ្ញុំបានពិនិត្យគិតពិចារណា ទៅលើចំណុចសំខាន់ជាច្រើនដែលពាក់ព័ន្ធទៅលើច្បាប់នៅអ.វ.ត.ក ក្នុងការស្វែងរកការពិត ក្នុងមហាឧក្រិដ្ឋកម្មនានា ដែលបានប្រព្រឹត្តក្នុងអំឡុងរបបកម្ពុជា ប្រជាធិបតេយ្យខ្មែរក្រហមនោះ ។

ម្យ៉ាងទៀត ខ្ញុំមានចំណាប់អារម្មណ៍ទៅលើសហព្រះរាជអាជ្ញាស៊ើបអង្កេត ដែលមានបេសកកម្មធំសំខាន់បំផុត ក្នុងការខិតខំប្រមែប្រមូលយកការបំភ្លឺពីមន្ត្រីសំខាន់ខ្លះ **តទៅទំព័រទី ១២**


# ពេទ្យធ្មេញសំរាប់គ្រួសារ Caring Dental For ALL Ages

Bright Smiles Dental 978 455-4039

COMPLETE ផ្តល់គ្រប់សេវាកម្ម
Services

- Cosmetic Dentistry
- Cosmetic Fillings
- Crowns & Bridges
- Dentures
- Extractions
- Implant Crowns
- Root Canal Therapy

- ត្រួតពិនិត្យទៀតទាត់ពេល
- សំអាតធ្មេញ
- ជំងឺចញ្ញ្រាញធ្មេញ
- ដកសរសៃធ្មេញ
- ស្រោប-តម្រឹម និងប៉ះធ្មេញ
- ធ្វើធ្មេញឱ្យស
- បំពេញធ្មេញប្រហោង
- ដកធ្មេញ

Most Forms of Insurance & Payment
ACCEPTED ទទួលគ្រប់ អ៊ិនស្វ៊ីរ៉ន
MassHealth • Cigna • Aetna
Amex • Discover • Visa • Mastercard

Convenient LOCATION
Next to Bank of America on Chelmsford Street

FREE
Teeth Whitening
New patients get a complimentary teeth whitening kit with completed exam, cleaning & x-rays at regular price. Cannot be combined with any other offers. Expires 30/04/2012

"EXCLUSIVE OFFER"
$55.00
Limited Time New Patient Special
(Regular Discount $55.99 a $250 Value)
Present coupon for discount. Includes exam, bite-wing x-ray & cleaning. Cannot be combined with other offers or insurance. Expires 30/04/2012

យើងមានអ្នកនិយាយភាសាខ្មែរ អង់គ្លេស ស្ប៉ានីស និងវៀតណាម សូមទូរស័ព្ទ 978-455-4039 ដើម្បីណាត់ជួបនៅថ្ងៃនេះ

724 Chelmsford Street • Lowell, MA • 978-455-4039
www.BrightSmiles-Dental.com




# ជំងឺផ្លូវចិត្តឬជំងឺខួរក្បាល ការយល់ដឹងរបៀបថ្មី

***កំណត់ខ្មែរប៉ុស្តិ៍***

*●មនុស្សទូទៅតែងយល់ថា "ជំងឺខួរក្បាល" ហៅថា"ជំងឺផ្លូវចិត្ត"ឬហៅតាមរបៀបចាស់ថា"ជំងឺឆ្កួត " នរណាដែលមានជំងឺនេះហើយរមែងត្រូវគេនិយាយថា ពុំអាចត្រឡប់ជាសះស្បើយឡើងវិញបានឡើយ ។ ទស្សនៈនេះត្រូវបានអ្នកវិទ្យាសាស្ត្រខាងចិត្តវិទ្យា និងវេជ្ជបណ្ឌិតមិនឱ្យត្រូវទៀតទេ នាពេលនេះ ហើយជំនឿនេះត្រូវបានក្លាយទៅជានយោបាយរបស់ប្រទេសដែលមានជំនឿរបស់ប្រជាពលរដ្ឋទៅលើការអាចព្យាបាលបានជំងឺផ្លូវចិត្ត គឺជាការកាត់បន្ថយនូវបុព្វហេតុនៃជំងឺជាច្រើនឯទៀតបាន ។*

*សហគមន៍ខ្មែរនៅសហរដ្ឋអាមេរិកនេះត្រូវការចំណេះនឹងបច្ចេកទេសដ៏ងាយស្រួលមួយចំនួន ដើម្បីជួយសម្រាលភាពងាយរងគ្រោះខាងសុខភាពក្នុងគ្រួសារខ្លួនបានច្រើន បើអ្នកទាំងនោះប្តូរការយល់ឃើញថា "ជំងឺផ្លូវចិត្ត" ពុំអាចព្យាបាលជាបានឱ្យទៅជា"ជំងឺផ្លូវចិត្ត" គឺជាជំងឺមួយដែលគេអាចព្យាបាលបានដូចជំងឺឯទៀតៗ មានផ្តាសាយ គ្រុនក្តៅ ។ល។ ជាដើម ។ សូមអានអត្ថបទរបស់អ្នកស្រី រដ្ឋា ម៉ាកលើរី នៃក្រសួងសុខាភិបាល ដែលមានដូចតទៅ :*

## តើជំងឺខួរក្បាលជាអ្វី?

**ដោយៈ រដ្ឋា**

មនុស្សដែលឈឺចាប់ដោយជំងឺខួរក្បាលជួបប្រទះនឹងការផ្លាស់ប្តូររបៀបដែលគេគិតអារម្មណ៍ចរិយា ។ ក្នុងន័យផ្សេងទៀត ការគិតអារម្មណ៍ និងចរិយារបស់គេ គឺមានការប្រចូកច្របល់គ្នា ឬគេមិនអាចទប់ទល់ទៅលើការគិតអារម្មណ៍ និងចរិយារបស់គេបានទេ ។ ដំណើរនេះនាំឱ្យមានការជ្រៀតជ្រែកទៅលើទំនាក់ទំនងការងារ និងការសប្បាយរីករាយនៅក្នុងឆាកជីវិតរបស់គេ ។

ការមានជំងឺខួរក្បាលអាចទៅជាផលវិបាកសម្រាប់ជននោះ និងក្រុមគ្រួសាររបស់ខ្លួន ហើយនេះមិនមែនជាការមួយដែលមិនត្រូវខ្មាស់អៀនឡើយ ។

**តើជំងឺខួរក្បាលបណ្តាលមកពីអ្វី?**

នេះជាការសំខាន់ដែលត្រូវតែយល់ឱ្យបានច្បាស់ថា ការកើតមានជំងឺខួរក្បាលមិនជាកំហុសរបស់នរណាម្នាក់នោះទេ ពេលខ្លះគេជឿថា វាបណ្តាលមកពីឈាមមិនល្អ ឬការទទួលទណ្ឌកម្ម ឬការទទួលផលអាក្រក់ពីការឃើញ ។ ក្នុងពេលសព្វថ្ងៃនេះវេជ្ជបណ្ឌិតជឿថា មានកត្តាមួយចំនួនដែលអាចនាំឱ្យកើតជំងឺខួរក្បាល :

- •ឥតមានភាពលំនឹងនៃភាពគីមីនៅក្នុងខួរក្បាល
- •មានភាពតានតឹង និងមានបញ្ហាប្រចាំថ្ងៃ
- •ជួបប្រទះការទុកព្រួយយ៉ាងខ្លាំង

នៅគ្រប់ស្ថានការទាំងអស់នេះ គឺជាការពិបាកឱ្យបានដឹងពិតប្រាកដអំពីបុព្វហេតុដែលបណ្តាលឱ្យកើតមានជំងឺខួរក្បាល ។

**តើជំងឺខួរក្បាលជាជំងឺតពូជឬ?**

ការស្រាវជ្រាវបានបង្ហាញឱ្យឃើញថា មនុស្សខ្លះអាចកើតមានលក្ខណៈតពូជកើតខុសកន្លែងដែលនាំឱ្យកើតមានជំងឺខួរក្បាលដោយព្រោះតែមានកត្តាស្មុគស្មាញជាច្រើននេះជាការល្អគួរពិគ្រោះជាមួយនឹងវេជ្ជបណ្ឌិតរបស់អ្នក ។

**តើជំងឺខួរក្បាលជាជំងឺឆ្លងឬ**

ជំងឺខួរមិនមែនដូចជាជំងឺផ្តាសាយ រោគកញ្ជ្រិលទេ វាមិនអាចឆ្លងបានឡើយ ។

**តើប្រភេទជំងឺខួរក្បាលដែលសំខាន់ជាគេមានអ្វីខ្លះ?**

**១-មានទុក្ខកង្វល់មិនទៀងទាត់**

អ្នកដែលកើតមានជំងឺនេះអាចជួបប្រទះការធ្លាក់ទឹកចិត្តការតក់ស្លុត ឬកង្វល់យ៉ាងខ្លាំង ។ លក្ខណៈរោគសញ្ញាទូទៅ : ដំណើរឡើងឈាម បេះដូង លោតញាប់ ឈឺក្រពះ ភ័យញ័រ តឹងសាច់ដុំ អារម្មណ៍មិននឹងនរដេកមិនសូវលក់ ។

**២-ដំណើរធ្លាក់ទឹកចិត្ត**

ដំណើរធ្លាក់ទឹកចិត្តប៉ះពាល់ទៅដល់សតិអារម្មណ៍របស់ជននោះ ។

ដំណើរធ្លាក់ទឹកចិត្តតិចៈ មនុស្សជាច្រើនជួបប្រទះការធ្លាក់ទឹកចិត្តតិចនៅក្នុងឆាកជីវិតរបស់គេឧទាហរណ៍ព្រួយដោយមិនចង់ធ្វើកិច្ចការអ្វីទាំងអស់ ។

**ដំណើរធ្លាក់ទឹកចិត្តខ្លាំង :** លក្ខណៈរោគសញ្ញាអាចរាប់បញ្ចូល :

- •ព្រួយចិត្តខ្លាំង ឬមានការអស់សង្ឃឹមជាខ្លាំង
- •បាត់ការចូលចិត្តធ្វើអ្វីៗមួយដូចជាៈ ការងារ ឬប្រកបកិច្ចការអ្វីមួយដែលជាការកំសាន្តអនាម័យ
- •ដេកមិនលក់
- •ឥតស្រេកឃ្លាន
- •ស្រក់ទម្ងន់
- •ខ្វះកម្លាំង
- •មានអារម្មណ៍ចង់តែសម្លាប់ខ្លួនឯង
- •មានអារម្មណ៍ថា ខ្លួនមានទោស
- •អស់សង្ឃឹម
- •មានអារម្មណ៍ថា ខ្លួនឥតមានប្រយោជន៍

ដំណើរធ្លាក់ទឹកចិត្ត ទោះបីជាតិចឬខ្លាំងក្តីអាចជាលទ្ធផលនៃប្រតិកម្មដែលប៉ះពាល់នៃសភាពការនៃការរស់នៅ ដូចជាការបាត់បង់អ្នកដែលជាទីស្រឡាញ់ការបញ្ឈប់លែងឱ្យធ្វើការងារ ។ ទោះបីជាយ៉ាងណាក៏ដោយវាមិនអាចឱ្យដឹងច្បាស់ទៅលើបុព្វហេតុខាងក្រៅបានឡើយ ។ ប្រសិនបើអ្នកមិនបានដឹងច្បាស់ពិតប្រាកដអំពីដំណើរនៃការធ្លាក់ទឹកចិត្តខ្លាំង សូមសាកសុំឱវាទពីអ្នកមានវិជ្ជាជីវៈ

**៣-បញ្ហាខាងផ្នែកចិត្តសាស្ត្រមិនទៀងទាត់**

អ្នកជំងឺដាច់ការទាក់ទងជាមួយនឹងភាពពិតមិនអាចដឹងនូវលក្ខណៈខុសគ្នារវាងភាពពិត និងភាពវង្វេងវង្វាយបានឡើយ ។ បញ្ហាខាងផ្នែកចិត្តសាស្ត្រមិនទៀតទាត់ពីរយ៉ាងដែលកើតមានទូទៅ គឺជំងឺបំបាក់ស្មារតី និងជំងឺឡប់ខួរក្បាល ។

**ជំងឺបំបាក់ស្មារតី**

រោគសញ្ញាអាចរាប់បញ្ចូល :

- •មានអារម្មណ៍ច្របូកច្របល់ ឬដំណើរធ្លាក់ទឹកចិត្ត
- •ដកខ្លួនចេញពីគ្រួសារមិត្តភក្តិនិងបន្ថយការទាក់ទងជាមួយសង្គម
- •ឮសំឡេងមនុស្សដែលមិននៅ ឬសំឡេងដែលគ្មាននរណាទៀតអាចឮ
- •ជឿថាមានជនដទៃចង់ធ្វើបាប់ខ្លួន
- •ជឿថាខ្លួនជាមនុស្សដែលល្បីឈ្មោះ ឬមានអំណាច
- •អារម្មណ៍ និងគំនិតមិនអាចផ្គុំគ្នាបាន ដូចជាសើចនៅក្នុងគំនិតដែលមិនសប្បាយចិត្ត ហើយដែលឥតមានមូលហេតុត្រឹមត្រូវ ។
- •គ្មានសមត្ថភាពនឹងធ្វើកិច្ចការប្រចាំថ្ងៃ ដូចជាមើលថែទាំអនាម័យ ឬការតមចំណីអាហារខ្លួនឯង ។

**ជំងឺឡប់ខួរក្បាល :** អាចប៉ះពាល់ទៅដល់អារម្មណ៍របស់អ្នកជំងឺ ។ អ្នកដែលកើតបញ្ហាអាចមានដំណើរអារម្មណ៍ចុះឡើងខ្លាំងនឹងខ្សោយណាស់ ។ រោគសញ្ញានៃដំណើរដែលមានអារម្មណ៍ "ខ្សោយ" អាចមានដូចជាៈ

- •មានអារម្មណ៍ទៅលើការបរាជ័យ ឬមិនមានប្រយោជន៍ **តទៅទំព័រទី១៤**




# មន្ទីរសុខភាព ART OF WELLNESS CENTER

647 Bainbridge St. Phila PA., 19147 215-305-2238

ទទួលព្យាបាលខ្លួន និងបញ្ហាផ្លូវចិត្តធ្វើទៅតាមទម្លាប់ និងជំនឿរបស់លោកអ្នកដោយប្រើរបៀបបច្ចេកទេសអាស៊ីនិងបច្ចេកវិទ្យាបរទេស ។

**ទទួលព្យាបាលគ្រប់វ័យ**

• ប្រើម្ជុលឥតថ្នាំ • ចាប់សរសៃ • ចិត្តវិទ្យា • យោគ/ភាវនា

TREATMENT TYPE

• Acupuncture • Acupressure • Psychotherapy • Yoga/ Meditation



www.artofwellnesscenter.com

ចំពោះលោកអ្នកមានការលំបាកណាមួយដូចចំណុចខាងក្រោម :

- ●Weight Management for Adult & Children
- ●Diabetes
- ●High Blood Pressure
- ●High Cholesterol Level Issue
- ● Pain Management
- ●Nutrition Consultation (Free)
- ● Women's Health
- ● គ្រប់គ្រងទម្ងន់សម្រាប់ចាស់និងក្មេង
- ● ទឹកនោមផ្អែម
- ● លើសសម្ពាធឈាម
- ● លើសកម្រិត កូលេស្តេរ៉ូល
- ● ឈឺខ្លួនប្រាណគ្រប់កន្លែង
- ● ពិគ្រោះពីម្ហូបអាហារ (មិនយកកំរៃ)
- ● សុខភាពស្ត្រី
- ●Insomnia (Difficulty Sleeping)
- ●Feeling Tired & Weak
- ● Stress /Anxiety
- ● Depression
- ● Family Issues
- ●Addiction Issues
- ●Anger Management
- ● ដេកមិនលក់
- ● អស់កម្លាំង មិនស្រួលខ្លួន
- ●ភាពតានតឹង/ការថប់អារម្មណ៍
- ●ធ្លាក់ទឹកចិត្ត
- ●មានវិបត្តិក្នុងគ្រួសារ
- ●ការញៀន និងអ្វីមួយ
- ●មានកំហឹងច្រើន

យើងទទួលយក AETNA នឹង UNITED HEALTHCARE CIGNA




# Home Improvement




ជួសជុល កែលំអរ សង់បន្ថែម

- Kitchen ចង្ក្រានបាយ
- Livingroom បន្ទប់ទទួលភ្ញៀវ
- Bathroom បន្ទប់ទឹក
- Bedroom បន្ទប់ដេក
- Roofing ដំបូល
- Siding ជញ្ជាំង
- Window បង្អួច
- Door ទ្វារ
- Basement ជាន់នៅក្រោមដី
- Additions បន្ទប់បន្ថែម

Residential • Commercial • Industrial

ទទួលប្រាក់គ្រប់ប្រភេទ

Bank Loan, Insurance, Compensation, Credit Debit Card, Check &Cash

More information call: 1.978.452.7467

www.simshomeimprovement.com

Boreth@simshomeimprovement.com




# ភោជនីយដ្ឋាន ឆាយណាស្តារ

## China Star

មានម្ហូបចិន
ម្ហូបប៉ូលីណេស៊ី
ម្ហូបចិនកង់តុង
ម្ហូបម៉ង់ដារិន

Chinese -Polynesian -Cantonese -Mandarin
369 Broadway St., Lowell, MA 01854
Tel: 978-454-7578, 978-454-7507

Open Daily: Sun. to Thurs. 11:00 AM to 1:00 AM
Fri. and Sat. 11:00 AM to 3:00 AM



យើងអាចយកម្ហូបទៅដល់ផ្ទះបាន

We Deliver All Day: 11:30 AM to 1:00 AM Available to most areas. Min. $10.00 Delivery Charge $2

$16.95

បង្កងឆាខ្ទឹម និងខ្ញីពិសេស

SPECIAL 2 Lobsters w/ Scallion & Ginger

# អាហារដ្ឋាន “បហ្វេ”

**Mandarin Buffet**
Parkway Plaza
1100 Revere Beach Parkway
Chelsea, MA 02150
617-889-0056
WWW.mandarinbuffetma.com
We have a full liquor license

**China Buffet**
Next to Target
203 Plain St.
Lowell, MA 01852
978-937-8868
WWW.chinabuffetma.com
Beer and Wine only

**China Buffet**
K-Mart Plaza180 Main
St.Saugus, MA 01906781-231-1588
Beer and Wine only

Buffet includes American & Chinese food bar, Japanese sushi bar, BBQ & grill, fruits,salad bar, ice cream, dessert cakes and much much more!

**10% OFF**
Before meal Tax
W. Purchase over $10 or More for the next time visting
Cannot be combined w. any other offer!
For dining only. exclude holiday!
All valet in 3 location:
China Buffet in Lowell
Mandarin Buffet in Chelsea
China Buffet in Saugus



**ALL YOU CAN EAT BUFFET... !!!**

# ទិវាសាំងវ៉ាឡង់តាញខ្មែរ

ដោយ : ខ្មែរប៉ុស្តិ៍

ទិវាដែលអាមេរិក-អឺរ៉ុប-អូស្ត្រាលី និងអាស៊ីបាននាំគ្នាប្រារព្ធរំលឹកគុណប្រយោជន៍នៃសេចក្តីស្រលាញ់ គឺពិភពលោកឱ្យន័យធំសម្បើមណាស់ចំពោះជោគជ័យដែលកើតចេញពីសេចក្តីស្រលាញ់ ឬស្នេហា តើន័យស្នេហាខ្មែរមានន័យដូចគ្នានឹងស្នេហានៃអ្នកដែលប្រារព្ធទិវាសាំងវ៉ាឡង់តាញ ធ្វើនៅថ្ងៃទី ១៤ ខែ កុម្ភៈ នេះ ?

ស្រលាញ់ផ្ទុយនឹងស្អប់ "តែថ្ងៃទី១៤ កុម្ភៈ ២០១២ នេះសហគមន៍ខ្មែរនៅឆ្នេរខាងកើតមានហ្វីឡាដែលហ្វៀ មានវ៉ាស៊ីតុន មានឡូវែល បានប្រារព្ធពិធីនេះដោយមានការជប់លៀងភោជនាហាររាំរែកទាំងអ្នកមានគូរ ទាំងអ្នកគ្មានគូរ យ៉ាងសប្បាយរីករាយដោយរាប់ទាំងចាស់ និងក្មេងផង ដូច្នេះសហគមន៍ខ្មែរជាទូទៅបានឱ្យកិត្តិយសដល់សេចក្តីស្រលាញ់យ៉ាងខង់ខ្ពស់ដូចគេឯងឯទៀតដែរ ។

ថ្ងៃដ៏សំខាន់នេះយើងគួរលើកមកពិចារណាបន្តិចដែរថា តើសេចក្តីស្រលាញ់នេះជាសីលធម៌ដែរឬទេ ? មែនហើយគ្រប់គ្នាសិក្សាពីមនុស្សសេចក្តីស្រលាញ់ប្រាកដជាប្រភព នៃកម្លាំងនៃការរីកចំរើននៃអំណោយ នៃការព្យាយាម អំណត់ជាប្រាកដ ក៏ប៉ុន្តែគេនៅតែឃើញនៅឡើយថា រនាំងនៃសេចក្តីស្រលាញ់នៅមានច្រើនសទ្ធិកសន្ទាប់នៅឡើយ ។





-ហេតុអ្វីក៏នៅមានការតំតួន រវាងគូស្នេហ៍រហូតដល់ប្រព្រឹត្តអំពើបាបដាក់គ្នាទៅកើត ?

-ហេតុអ្វីក៏មានគូសង្សារវ័យក្មេងមួយចំនួនសុខចិត្តសម្លាប់ខ្លួនដោយសារតែនៅមានឪពុកម្តាយជំទាស់នឹងសេចក្តីស្នេហារបស់ខ្លួន ។

-ហេតុអ្វីក៏យុវនារីខ្លះ គ្មានសេចក្តីក្លាយហានគ្រប់គ្រាន់នឹងបង្ហាញពីអារម្មណ៍ស្រ-លាញ់របស់ខ្លួនដល់មនុស្សដែលខ្លួនស្រលាញ់ជួនកាលចរិតស្ត្រី ឬបុរសគ្រប់លក្ខណ៍នៅព្រៅមួយជីវិតក៏មាន ?

-ហេតុអ្វីក៏ទ្រព្យសម្បត្តិបុណ្យសក្តិ វណ្ណៈ ពណ៌សម្បុរ ស្រែកអាចយកជាលេសមកទប់ស្កាត់សេចក្តីស្នេហាមិនឱ្យកើតមានឡើង...?

ករណីជាបុព្វហេតុរាប់មិនអស់នេះហើយ ដែលកំពុងកើតរីកសុសសាយនៅក្នុងសហគមន៍ឡើងជាធម្មជាតិ គឺការស្រលាញ់រវាងម្តាយឪពុក និងកូនប្រុសស្រី ឬជីតាជីដូនជាមួយចៅ ឬក៏មាមីងជាមួយកូនក្មួយជាសេចក្តីស្រលាញ់ដែលមានន័យផ្ទុយពីធម៌ព្រះពុទ្ធ គឺការកើតហើយមិនស្លាប់ទៅវិញទេ ដែលគេអាចរាប់បញ្ចូលទៅក្នុងសេចក្តីប្រាថ្នារបស់ទិវាវ៉ាឡង់តាញនោះដែរ ។

សេចក្តីស្រលាញ់នេះ មិនត្រឹមតែសំខាន់សម្រាប់ទិវាវ៉ាឡង់តាញទេ វាក្លាយទៅជាច្បាប់ដ៏សំខាន់បំផុតសំរាប់ដឹកនាំមនុស្សឱ្យចេះស្រឡាញ់កូនចៅនៅក្មេងដោយការស្រឡាញ់ ការបីបមថ្នាក់ថ្នម ការ-ពារ និងការប្រៀនប្រដៅបង្រៀនឱ្យក្លាយទៅជាមនុស្សប្រពៃអាចក្លាយទៅជាអ្នកដឹកនាំសង្គមបាន ។ ជាថ្មីម្តងទៀតយើងសង្កេតឃើញព្រឹត្តិការណ៍ដ៏គួរអា - ណិតអាសូរបំផុត ដល់កុមារាកុមារីខ្មែរដែលត្រូវបញ្ឈប់ការសិក្សានៅមធ្យមសិក្សាស្ទើទាំងអស់អនាថា ចូលរួមសង្គមពាលរាប់មិនអស់ញៀនគ្រឿងពុលស្ទើរគ្រប់គ្នា មានសម្តាយកូនចៅមុនអាយុគ្រប់ការ ដោយបង់ចិត្ត ដោយគ្មានបំណងការជួយណែនាំ ការពារដោយគ្មានការគ្រប់គ្រង ដោយគ្មានមនុស្សដែលមានការស្រឡាញ់ក្នុងខ្លួន ។

បាត់បង់ឧត្តមគតិ "ទិវា សាំងវ៉ាឡង់តាញ" ចំពោះកុមារ ធ្វើឱ្យដែនដីមហាសេដ្ឋីអាមេរិកាំង ពុំអាចជួយឱ្យមនុស្សតូចទាប ឱ្យអាចទៅជាខ្មែរសព្វថ្ងៃដោយពុំមាននរណា គ្រូបង្រៀនណា ឬព្រឹទ្ធាចារ្យណាហ៊ានលើកករណីទាំងឡាយនោះ មកលាតត្រដាងជាសាធារណៈសម្រាប់ជាជំនួយដល់ការពិចារណាក្រុមគ្រួសារខ្មែរឡើយទេ ។

សេចក្តីស្រឡាញ់ ឬស្នេហាទាមទារនូវការយោគយល់ ការលួងលោម ការថែទាំយកអាសារដោយគ្មានចង់ទាមទារអ្វីជាសំណងឡើយ ។ ការដែលចេះតែយកអាសារគ្នានេះហើយ ដែលគេតែងសង្កេតឃើញនៅលើបុគ្គលិកលក្ខណៈនៃមនុស្សស្រីទោះបីជាបានសិទ្ធិស្មើរគ្នា ក៏នៅមនោសញ្ចេតនាដ៏ជ្រាលជ្រៅជាងបុរសដែលសម្បូរតែការគិតពីផ្លូវភេទនៅក្នុងបេះដូងរបស់ខ្លួន ។ នេះជាបុព្វហេតុនាំសេចក្តីស្រឡាញ់បានក្លាយទៅជាទាបខ្ពស់ ទៅជាសគុណពេញសិទ្ធិនៃភាគីនីមួយៗមានភាពមិនស្មើរគ្នា ហើយត្រូវបានគេគិតថា ជាគុណស្រ័យអ្វីមួយបាននោះ។

យោងតាមអត្ថន័យដ៏ខ្លីនេះ យើងគួរតែនឹកអាណិតអាសូរដល់អ្នកដែលពុំបានភ្លក់រស់ជាតិដ៏ឈ្ងុយឆ្ងាញ់ ដែលពុំអាចបំភ្លេចបានក្នុងមួយជីវិតពីសេចក្តីស្រឡាញ់ដ៏ស្មោះស្ម័គ្រ ឬក៏បានសេចក្តីស្រឡាញ់ដ៏សុខដុម ហើយត្រូវបាត់បង់ទៅវិញដោយបុព្វហេតុណាមួយ ។ នេះគឺជាការបាត់បង់រស់ជាតិនៃជីវិតនៃកម្លាំងពលំនៃមនុស្ស ហើយជាពិសេសរបស់គ្រួសារ និងរបស់ប្រទេសដែលខ្លួនរស់នៅ ។

-រីឯការស្រឡាញ់មួយទៀត ដែលបានកើតដោយការពារ ដោយគ្មានការគ្រប់គ្រងដោយគ្មានមនុស្សដែលមានការស្រឡាញ់ក្នុងខ្លួន។

បាត់បង់ឧត្តមគិត **"ទិវា សាំងវ៉ាឡង់តាញ"** ចំពោះកុមារធ្វើឱ្យដែនដីមហាសេដ្ឋីអាមេរិកាំង ពុំអាចជួយឱ្យមនុស្សតូចទាប ឱ្យអាចទៅជាសំខាន់បានឱ្យមាតាបិតាគ្មានមនស្សបន្តពូជ បន្តពាណិជ្ជកម្មឱ្យសង្គមគ្រួសារ និងសហគមន៍ខ្លួនឯងគ្មានអនាគតភ្លឺស្វាង។ ខ្មែរច្រើនណាស់ពុំបានដឹងថា សហរដ្ឋអាមេរិកគេបានធ្វើវិនិយោគធំជាងគេបង្អស់លើវិស័យអប់រំ ជាពិសេសលើការស្រឡាញ់ ថែទាំ ការពារកុមាររាប់ទាំងកុមារខ្មែរផងដែរនោះទេ ។ សំខាន់ជាងគេនេះទៅទៀតគឺនៅតែពុំទាន់បានដឹងថា បើទោះបីជាកំពុងមានការថ្លោះធ្លោយធ្វើខុសជ្រុលទៅហើយក្តី ក៏ឪពុកម្តាយនៅតែអាចកែស្ថានភាពនោះឱ្យបានប្រសើរឡើងវិញបាននៅឡើយឱ្យតែមានឆន្ទះមុះមុតថា សេចក្តីស្រឡាញ់ចំពោះកូនចៅខ្លួននៅមាននៅឡើយទេ។

-នៅមានសេចក្តីស្រឡាញ់មួយទៀត ដែលមនុស្សជាច្រើនយល់ថា **"ទិវា សាំងវ៉ាឡង់តាញ"** បានឧទ្ទិសជូនដែរនោះ គឺការស្រឡាញ់រាប់អានជាមិត្តភក្តិដ៏ល្អ ។ គឺជាការស្រឡាញ់រាប់អានដោយមិនប្រកាន់អាយុ ឬពណ៌សម្បុរ មានការគោរពស្មើរភាពគ្នាចេះលើកដំកើនគ្នា បបួលគ្នាធ្វើអំពើល្អ ការពារគ្នាក្នុងលក្ខណៈសីលធម៌ពិចារណារួមគ្នា ។ល ។

សង្គមនៃសហរដ្ឋអាមេរិកនេះ តម្រូវឱ្យប្រជាពលរដ្ឋចេះរួមរស់ជាមួយគ្នា ចេះមូលមតិគ្នាកសាងភូមិ ស្រុក សាលារៀនអ្នកគ្រប់គ្រងបាន។

តែសហគមន៍ខ្មែរ **តទៅទំព័រទី១៨**

BUY RITE 267-297-5897

PHARMACY

RITE PRICE . RITE ADVICE . WE CARE

BUY RITE 267-297-5897

សូមស្វាគមន៍

ក្នុងនាមជាឱសថការី ខ្ញុំ ដាន់ ចាប់ មានសេចក្តីរីករាយ និងបំរើបងប្អូនក្នុងសហគមន៍ឲ្យមានសុខភាពល្អ មាំមួន គ្រប់ៗគ្នា

•ផ្ញើថ្នាំជូនដល់ផ្ទះដោយឥតគិតថ្លៃ
•ទទួលអ៊ិនស្វ៊ីរិនស្ទើរគ្រប់មុខ
•ទទួលបន្តផ្តល់ថ្នាំដែលលោកអ្នកកំពុងប្រើទិញមកពីឱសថស្ថានផ្សេងៗ
•តម្លៃថោកៗបំផុត និងមានស្តុកឱសថគ្រប់មុខប្រភេទ
•ផ្តល់សេវាដោយរហ័សទាន់ចិត្ត
•មានឱសថវីតាមីន-ឱសថចិនសែ និងឧបករណ៍ព្យាបាលមុខជំងឺ

1337 W.Rockland St.Philadelphia, PA 19141
(corner of Old York Rd & Rockland St.)
Tel: 267-297-5879 Fax: 267-297-5880

តមកពីទំព័រទី ៧

# លិខិតឆ្លើយតប

ដែលធ្លាប់បានចូលរួមក្នុងការដឹកនាំមេខ្មែរក្រហមកម្ពុជាប្រជាធិបតេយ្យនោះដែរ ដូចជា សម្ដេចសីហនុ លោក ហេង សំរិន លោក ជា ស៊ីម លោក គាត ឈន់ លោក ហោ ណាំហុង ជាដើម ដើម្បីចូលខ្លួនទៅក្នុងតុលាការ ថ្លែងបំភ្លឺ និងជួយផ្ដល់ឯកសាររឿងពិតដែលមេដឹកនាំខ្មែរក្រហមបានប្រព្រឹត្តនោះ ឱ្យបានងាយស្រួលក្នុងការបង្កើតជាសំណុំរឿងជំនុំជំរះកាត់ទោស ឱ្យបានសមស្រប ទៅតាមគតិយុត្តិធម៌របស់តុលាការពិសេសនេះ។

ខ្ញុំឃើញមានរឿងសំខាន់ដែលដាក់ជាសំណួរថា តើនឹងមានអ្វីកើតឡើងជាបន្តទៅទៀត?

ខ្ញុំរំពឹងគិតថា ជនជាប់ចោទទាំង៤នាក់ គឺ ខៀវ សំផន នួន ជា អៀង សារី និងអ្នកស្រី អៀង ធីរិទ្ធ តុលាការពិសេសនេះ ពុំអាចជំនុំជំរះកាត់ទោសបានដោយងាយស្រួលនោះឡើយ ប្រហែលត្រូវប្រើពេលវេលាយ៉ាងយូរអង្វែងទៅមុខទៀត ។ ពីព្រោះខ្ញុំយោងទៅលើការដកពាក្យបណ្ដឹងរដ្ឋប្បវេណី របស់កញ្ញា បណ្ឌិត សេង ធារី និងការពន្យល់បំភ្លឺអំពីសភាពស្មុគស្មាញនៅក្នុងតុលាការពិសេសនេះ ។ ព្រមទាំងមានសេចក្ដីថ្លែងទាមទារតវ៉ាពីប្រមុខរដ្ឋាភិបាល ហ៊ុន សែន ដោយពុំព្រមទទួលយកសហព្រះរាជអាជ្ញា ដែល អ.ស.ប តែងតាំងថ្មី ឱ្យមកជំនួសសហព្រះរាជអាជ្ញាដែលបានលាឈប់ទៅនោះ។

ម្យ៉ាងទៀតនាយករដ្ឋមន្ត្រី ហ៊ុន សែន ក៏ធ្លាប់បាននិយាយពីពេលមុនរួចមកហើយដែរថា ហ៊ុន សែន មិនអនុញ្ញាតឱ្យតុលាការកាត់ទោសមេខ្មែរក្រហមនេះ មានដំណើរការទៅមុខទៀតបានទេ ហ៊ុន សែន សុខចិត្តរំលាយតុលាការនេះចោល មិនបណ្ដោយឱ្យសង្គ្រាមកើតឡើងនៅក្នុងកម្ពុជាឡើយ បើវាអស់លុយគ្មានប្រាក់ខែឱ្យសហព្រះរាជអាជ្ញា និងសហចៅក្រមទាំងនោះទេ អញបន់ឱ្យវាអស់លុយទៅអញនឹងយកតុលាការនេះ មកធ្វើដោយខ្លួនអញម្ដង។

ក្នុងនាមខ្ញុំជាជាតិខ្មែរ រស់នៅសហរដ្ឋអាមេរិក ដែលមានចម្ងាយរាប់ម៉ឺនគីឡូម៉ែត្រ ពីមាតុភូមិខ្មែរ ហើយជាជនរងគ្រោះបានដាក់ពាក្យបណ្ដឹងជាផ្លូវការ ដូចគ្នាជនរងគ្រោះប៉ុន្មានពាន់នាក់នោះដែរ មកដល់ថ្ងៃនេះ រូបខ្ញុំមានការសោកស្ដាយស្រណោះខ្លាំងណាស់ នឹងរកពាក្យឆ្លើយតបនឹងសំនួរខាងលើនេះថាដូចម្ដេចឡើយ ខ្ញុំមានតែសេចក្ដីអស់សង្ឃឹម ស៊ូលេបថ្ម លេបគ្រួសតទៅទៀត ទំរាំដល់ពេលស្លាប់ទៅ ។ ពីព្រោះព័ត៌មានចុងក្រោយ ស្ដីពីសហព្រះរាជអាជ្ញាថ្មី ខាងការស៊ើបអង្កេត ដែលត្រូវដាក់ជំនួសនេះ ត្រូវបាននាយករដ្ឋមន្ត្រី ហ៊ុន សែន បដិសេធមិនទទួលស្គាល់ មិនទទួលយកមកបំពេញមុខនាទីបន្ត នៅក្នុងអង្គជំនុំជំរះវិសាមញ្ញក្នុងតុលាការកម្ពុជានេះបានឡើយ។

ដូច្នេះ នេះគឺជាសញ្ញានៃការចូលជ្រៀតជ្រែក និងជាជោគជ័យធំណាស់ របស់នាយករដ្ឋមន្ត្រីខ្មែរ ហ៊ុន សែន និងជាសញ្ញាបង្ហាញពីភាពទន់ខ្សោយជាលើកទី២ របស់ អ.ស.ប បន្ទាប់ពី អ.ស.ប បានបង្កើត អ៊ុនតាក់ ឱ្យទៅរៀបចំសន្តិភាព និងធ្វើការបោះឆ្នោតសកលជ្រើសរើសយកនាយករដ្ឋមន្ត្រីថ្មី នាឆ្នាំ១៩៩៣ ហើយត្រូវបរាជ័យទាំងស្រុងនោះដែរ។ តទៅទំព័រទី ១៥

ហាងមាសរស្មី
SUNSHINE JEWELRY, INC.
215-271-2950
Certified Diamonds & Golds (24K & 18K)
Men & Women Jewelries & Watches
Custom Design & Repairs on Premise
15 Years in Services & Growing Strong
702 Washington Ave. Phila., PA 19147
www.sunshinejewelryonline.com

ហាងមាសខ្មែរអង្គរ
Khmer-Angkor Jewelry
金美成珠寶行
Since 1983
Certified Diamonds & Diamond Jewelry
18K & 24K Gold, Platinum Jewelry & Watches
GIA Graduate Gemologist on Staff
Authorized RADO & LONGINES Dealer
Repairs Done on Premises
600 Washington Avenue. Unit 12B.
Philadelphia, PA 19147
Tel. 215-599-2222
Fax. 215-599-2223
Open
Tuesday-Sunday
10:30AM-6:30PM
Closed Monday
Photo by Kay Lim Photography

ឌឹ ខេមបូឌា ដេលី The Cambodia Daily

អត្ថបទដកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌឹ ខេមបូឌា ដេលី

ច្បាប់ចេញផ្សាយថ្ងៃសុក្រ ទី១៧ ខែកុម្ភៈ ឆ្នាំ២០១២

## វិទ្យាស្ថាន EIC ព្យាករថា កំណើនសេដ្ឋកិច្ចកម្ពុជា នឹងកើនដល់៦,២ភាគរយក្នុងឆ្នាំ២០១២

ដោយ : OLESIA PLOKHII

ខេមបូឌា ដេលី

យោងតាមរបាយការណ៍ដែលវិទ្យាស្ថានសេដ្ឋកិច្ចកម្ពុជាហៅកាត់ថា EIC បានចេញផ្សាយកាល ពីម្សិលមិញបានឱ្យដឹងថា កំណើនសេដ្ឋកិច្ចនៅក្នុងប្រទេសកម្ពុជាតាមការប៉ាន់ប្រមាណថា និងធ្លាក់ចុះបន្តិចបន្តួចមកត្រឹម៦.២ភាគក្នុងឆ្នាំ២០១២ នេះ ដោយសារតែការធ្លាក់ចុះតម្រូវការសម្លៀកបំពាក់នៅទីផ្សារក្នុងតំបន់អឺរ៉ុប និងអាមេរិក ។

ការព្យាករនេះធ្វើឡើងបន្ទាប់ពីលោកនាយករដ្ឋមន្ត្រី ហ៊ុន សែន បានប្រកាសនៅឯសន្និសីទសេដ្ឋកិច្ចមួយក្នុងរាជធានីភ្នំពេញថា កំណើនសេដ្ឋកិច្ចនឹងឡើងដល់៦.៥ភាគរយ ។ កាលពីម្សិលមិញនេះ មូលនិធិរូបិយវត្ថុអន្តរជាតិក៏បានព្យាករឃើញដូច្នេះដែរ ។

EIC បានលើកឡើងនៅក្នុងរបាយការណ៍នេះថា "ដោយសារតែបញ្ហាជំពាក់បំណុលរបស់រដ្ឋាភិបាលអឺរ៉ុប ទំនងជានឹងកាន់តែធ្ងន់ធ្ងរនេះ ឆ្នាំ ២០១២មិនមែនជាឆ្នាំល្អសម្រាប់ឧស្សាហកម្មវាយនភណ្ឌ និងកាត់ដេរនៅកម្ពុជាឡើយ ។

EIC បានឱ្យដឹងទៀតថា ខ្លួនបានកែប្រែការព្យាករអំពីកំណើននៃឧស្សាហកម្មនេះ ពី១១.៣ភាគរយមកត្រឹម ៩.៤ភាគរយវិញ ។

យោងតាម EIC បានឱ្យដឹងថា កំណើនសេដ្ឋកិច្ចនៅក្នុងប្រទេសកម្ពុជា តទៅទំព័រទី១៥

## Economy May Grow 6.2% in 2012, Says Report

By Olesia PlokhII
THE CAMBODIA DAILY

Economic growth in Cambodia is etimated to slow slightly to reach 6.2 percent in 2012 due to an expected drop in demand for garments from sluggish markets in Europe and the US, according to a report released by the Economic Institute of Cambodia (EIC) yesderday.

The prediction came as Prime Minister Hun Sen announced at an economic conference in Phnom Penh that growth would reach 6.5 percent, an estimated rate also shared yesterday by the International Monetary Fund.

"As sovereign debt woed in Europe are likely to deepen, the year 2012 does not bode well anymore for Cambodia´s textile and garment industry," the EIC said in the report, adding that it had revised its growth estimate for the industry down to 9.4 percent year-on-year from a previous estimate of 11.3 percent.

According to the EIC, economic growth in Cambodia reached 7.8 percent last year, but weak demand abroad for garments coupled with a fall in demand for raw agricultural products means growth this year will only be "modest."

"Ask a result of Continued to Page15

## មេអង្គរក្សលោក ជា ស៊ីម ត្រូវផ្តន្ទាទោសតាមការចោទ៤ករណី

ដោយ : ឃី សុវុទ្ធី

ខេមបូឌា ដេលី

ទើបតែមួយថ្ងៃប៉ុណ្ណោះ បន្ទាប់ពីតុលាការយោធាបើកសវនាការជំនុំជម្រះលោកជុំវិញបទល្មើសជាច្រើនពាក់ព័ន្ធនឹងកិច្ចការយោធាអតីតមេអង្គរក្សរបស់លោក ជា ស៊ីម ប្រធានព្រឹទ្ធសភា ត្រូវបានសាលាដំបូងរាជធានីភ្នំពេញកាត់ទោសឱ្យជាប់ពន្ធនាគាររយៈពេល១០ឆ្នាំតាមការចោទប្រកាន់៤ករណីទាក់ទងនឹងការក្លែងបន្លំឯកសារសាធារណៈ និងការប្រើប្រាស់អាវុធខុសច្បាប់ ។

លោកឧត្តមសេនីយ៍ឯក ឈឿន ចាន់ថន អតីតប្រធានអង្គភាពកងអង្គរក្សរបស់លោក ជា ស៊ីម និងអ្នកក្រោមបង្គាប់ដ៏ជិតស្និទ្ធម្នាក់របស់លោក ក៏ត្រូវបានធ្វើពិន័យជាប្រាក់ប្រាំលានរៀលថែមទៀត ( ប្រហែលចំនួន១.២៥០ដុល្លារអាមេរិក) ផងដែរ ពីបទប្រើប្រាស់អាវុធដោយខុសច្បាប់ការបញ្ជាឱ្យប្រើប្រាស់អាវុធដោយគ្មានការអនុញ្ញាតការ ក្លែងបន្លំឯកសារសាធារណៈ និងពីបទប្រើប្រាស់ឯកសារក្លែងក្លាយ ។

លោកឧត្តមសេនីយ៍ឯក ចាន់ថន គឺជាសមាជិកចុងក្រោយបំផុត របស់ក្រុមលោក ជា ស៊ីម ដែលត្រូវបានយកមកកាត់ទោសតាមការចោទប្រកាន់បែបនេះ ។

កាលពីក្នុងខែធ្នូសមាជិកជាន់ខ្ពស់បួនរូបរបស់លោក ជា ស៊ីម ត្រូវតុលាការផ្តន្ទាទោសឱ្យជាប់ពន្ធនាគាររយៈពេលពីបីឆ្នាំទៅបួនឆ្នាំបន្ទាប់ពីត្រូវបានរកឃើញថា មានពិរុទ្ធភាពគ្រប់គ្រាន់ក្នុងការក្លែងបន្លំឯកសារ ។

ក្រុមនេះត្រូវបានចោទប្រកាន់ពីបទបោកប្រាស់លោក ជា ស៊ីម ឱ្យចុះហត្ថលេខាលើកិច្ចសន្យាក្លែងក្លាយមានទឹកប្រាក់រាប់លានដុល្លារ ។ ពួកគេក៏ដូចជាលោកឧត្តមសេនីយ៍ឯក ចាន់ថន ដែរ ធ្វើការបដិសេធរហូត ចំពោះការចោទប្រកាន់ទាំងអស់នេះ ហើយបច្ចុប្បន្ននេះកំពុងតែប្តឹងឧទ្ធរណ៍ជំទាស់នឹងសេចក្តីសម្រេចរបស់សាលាដំបូងរាជធានី ដោយត្រូវបានចាប់ខ្លួនកាលពីក្នុងខែសីហា ។ លោកឧត្តមសេនីយឯក ចាន់ថន បានប្រឈមនឹងការចោទប្រកាន់ជាច្រើនករណីទាំងនៅឯសាលាដំបូងរាជធានីភ្នំពេញ និងតុលាការយោធា ។ មេធាវីរបស់ក្រសួងការពារជាតិ និងមេធាវីរបស់អ្នកតំណាងឱ្យលោក ជា ស៊ីម បានអះអាងថា អស់រយៈពេលច្រើនឆ្នាំមក ហើយមេអង្គរក្សរូប នេះបានទិញទ្រព្យសម្បត្តិយោធារួមមានដីធ្លី អាវុធ និងរថយន្តដោយគ្មានការអនុញ្ញាត ហើយបានយកប្រាក់នេះដាក់ហោប៉ៅខ្លួនឯង ។

លោកត្រូវបានចោទប្រកាន់ ពីបទក្លែងបន្លំឋានន្តរស័ក្តិរបស់ខ្លួន ដោយប្រើអត្តសញ្ញាណប័ណ្ណរបស់មន្ត្រីកងយោធពលខេមរភូមិន្ទម្នាក់ ដែលបានស្លាប់ទៅ និងត្រូវបានចោទប្រកាន់ពីបទក្លែងបន្លំបទបញ្ជាបេសកម្មការចាត់តាំងអង្គភាពរបស់លោកដោយគ្មានការអនុញ្ញាតពីក្រសួងការពារជាតិ ។

នៅពេលនគរបាលបានឆ្មក់ចូលផ្ទះរបស់លោកនៅខណ្ឌចំការមន ពួកគេបានរកឃើញអាវុធជាច្រើនដើម និងគ្រាប់កាំភ្លើងចំនួន១.៤០០គ្រាប់ ដែលឧត្តមសេនីយ៍ឯក ចាន់ថន បានមានប្រសាសន៍ថា លោករក្សាទុកបណ្តោះអាសន្ននៅផ្ទះរបស់លោក បន្ទាប់ពីបំពេញបេសកម្មជូនមុខឱ្យលោក ជា ស៊ីម ។

មេធាវីរបស់លោកឧត្តមសេនីយ៍ឯក យឹម លាង ដែលបច្ចុប្បន្នជាប្រធានអង្គភាពកងអង្គរក្សរបស់លោក ជា ស៊ីម បានមានប្រសាសន៍កាលពីម្សិលមិញថា លោករីករាយចំពោះលទ្ធផលនេះ ។ តែមេធាវីការពារចុងចោទបានមានប្រសាសន៍ថា ពួកគេនឹងប្តឹងឧទ្ធរណ៍ ។

មានប្រសាសន៍យ៉ាងខ្លីជាមួយអ្នកយកព័ត៌មានបន្ទាប់ពីការប្រកាសសាលក្រមកាលពីម្សិលមិញ លោកឧត្តមសេនីយ៍ឯក ចាន់ថន បានមានប្រសាសន៍ថា វាអយុត្តិធម៌ណាស់ខ្ញុំមិនអាចទទួលយកបានទេ តទៅទំព័រទី១៥

## Chea Sim Bodyguard Convicted on Four Counts

By Khy Sovuthy
THE CAMBODIA DAILY

Just one day after his hearing at the Military Court for a long list of alleged military crimes, the former top bodyguard for Senate President Chea Sim was sentenced yesterday to 10 years in prison at the Phnom Penh Municipal Court on four counts related to forgery and illegal weapons possession.

Lieutenant General Chhoeun Chanthan, formerly the head of Mr. Sim´s bodyguard unit and one of his closet associates, was additionally fined 5 million riel (about $1,250) for illegal weapons possession, ordering the use of weapons without authority, forging public documents and using forged documents.

Lt. Gen. Chanthan is the latest member of Mr. Sim´s inner circle to be convicted on such charges. In December, four high-ranking associates of Mr. Sim received three and four years sentences after being found guilty of fraud. The group is accused of having tricked Mr. Sim into signing bogus contracts worth millions of dollars. They, like Lt. Gen. Chanthan, denied all accusation to the end and are currently appealing the court´s decision.

Arrested in August, Lt. Gen. Chanthan has faced a raft of charges at both the municipal and military courts. Lawyers for the Defense Ministry and Mr. Sim´s representative contend that, for years, the bodyguard chief sold military property including land, weapons and vehicles without permission and pocketed the proceeds.

He was accused of having falsified his rank, using the identity card of a head RCAF official and of having forged mission orders, sending his unit on assignemnt without the go-ahead of the Defense Ministry.

When police raided his Chamkar Mon district house, they uncovered nearly a dozen firearms and 1,400 bullets, which Lt. Gen. Chanthan said he was temporarily storing at his home following a mission conducted on behalf of Mr. Sim a few days prior.

Attorney for Lietenant General Yim Leang, the current chief of Mr. Sim´s bodyguard unit, said yesterday he was pleased with the outcome. The defense said they would appeal.

Speaking briefly with reporters following yesterday´s verdict announcement, Lt.Gen. Chanthan said he considered the convictions highly inappropriate.

"It is very unjust, and I can not accept it. I will appeal," he said, declining to elaborate further.

His lawyer, Puth Theavy, said the defense team felt the evidence was scant. "The punishment of my client was very extreme. There was no evidence of his having forged documents and none on his use of the documents," he said. Mr. Theavy disputed the weapons charges, saying it was hardly unusual for a man of his rank to possess that number of firearms at any one time.

"Please, all bodyguard chief and high-ranking leaders including police, military police and RCAF soldiers: Be careful, because if you have a few guns in your house, you´ll be imprisoned for 10 years," he added.

ក្រុមហ៊ុនធានារ៉ាប់រងដែលបានបំរើសង្គម២២ឆ្នាំហើយ
CONWAY INSURANCE

For over 23 years, Conway Insurance Agency has been your community's one-stop provider of quality insurance services in New England.
We are a full-service agency offering:

- Personal Insurance
  - Autos
  - Homes
  - Apartments
  - Jewelry
  - Fine arts
  - Collectibles
- Business Insurance
  - Property
  - Liability
  - Professional Liability
  - Worker's compensation
  - Bonds
  - Auto, Garage keepers.
  - Disability and life insurance (individual and group products)
  - Other specialty programs

ក្រុមហ៊ុនធានារ៉ាប់រង ផ្ទះ រថយន្ត មុខរបរ និងសុខភាព
យើងនិយាយភាសាខ្មែរ




P.O. Box 1744
77 E. Merrimack Street
Lowell, MA 01853
Tel: 978-454-5054
Fax: 978-453-2480

www.ConwayInsurance.com

សូមសួររក Philip Muth, Philip@ConwayInsurance.com

## តមកពីទំព័រទី ៨ ជំងឺផ្លូវចិត្ត ឬជំងឺខួរក្បាល...

- មានអារម្មណ៍ចេះតែចង់សម្លាប់ខ្លួន
- ដេកមិនសូវលក់
- ញុំាមិនសូវចូល

រោគសញ្ញានៃដំណើរដែលមានអារម្មណ៍ "ខ្លាំង" អាចមានដូចជា:

- ឆាប់ខឹង
- ពាក្យសំដីអាចលាយឡំគ្នា ពីព្រោះនិយាយលឿនពេក
- ធ្វើទៅតាមសន្ទុះចិត្ត
- ជឿថាខ្លួនជាមនុស្សម្នាក់ដែលល្បីឈ្មោះ ឬមានអំណាច

**តើមានអ្វីដែលអាចជួយអ្នកមានបញ្ហានេះ?**

អ្នកដែលជួបប្រទះនិងការពិសោធន៍ទៅលើរោគសញ្ញានេះ ត្រូវតែស្វែងរកខាងជំនួយផ្នែកពេទ្យ។ ជំងឺខួរក្បាល ក៏ដូចគ្នានឹងជំងឺរាងកាយដែរ ។ ប្រសិនបើអ្នកជំងឺទទួលការព្យាបាលជំងឺនេះនៅពេលចាប់ឈឺ ឬមុនពេលចាប់ឈឺខ្លាំងគេអាចព្យាបាលបានសះស្បើយ ។

ប្រសិនបើអ្នកយល់ឃើញថា មានអ្វីចម្លែកកើតមានឡើងដល់អ្នកការសាកសួរសុំជំនួយ ឬនិយាយទៅកាន់អ្នកណាម្នាក់បានក៏ពេលដ៏ឆាប់នោះជាការប្រសើរណាស់។

ចំណុចមួយឬចំណុចច្រើន ដែលមានចុះនៅខាងក្រោមនេះអាចជួយអ្នកជំងឺបាន :

**១-ថ្នាំពេទ្យ:** អាចជួយព្យាបាលអ្នកជំងឺក្នុងសណ្ឋាននៃជំងឺខួរក្បាលខ្លះ ។ អាចជួយទប់ទល់ និងរោគសញ្ញា។

**២-ការផ្គត់ផ្គង់ និងផ្ដល់ឱវាទ :** ដោយនិយាយប្រាប់អ្នកណាម្នាក់អំពីបញ្ហាដែលកើតមាន ដើម្បីឱ្យជួយដោះស្រាយជំងឺ និងរោគសញ្ញាទាំងនេះ។

**៣-ក្រុមផ្គត់ផ្គង់ :** ជួយ និងនៅជាមួយមនុស្សដែលមានជំងឺខួរក្បាល ។ ក្រុមគ្រួសារអាចមកជួបជុំជាមួយនឹងក្រុមគ្រួសារឯទៀត ដែលមានសមាជិកកើតជំងឺខួរក្បាលនេះដែរ ។ ក្រុមទាំងនេះអាចឱ្យអ្នកទាំងនេះមានឱកាសក្នុងចែករំលែកបទពិសោធន៍រៀនអំពីជំងឺខួរក្បាល និងជួយផ្គត់ផ្គង់គ្នាទៅវិញទៅមក។

**៤-ការហាត់ហ្វឹកហ្វឺនអប់រំធ្វើឱ្យបានប្រសើរឡើងវិញ:** រៀនវិធីថ្មីដែលជួយទប់ទល់ដោះស្រាយបញ្ហាប្រចាំជីវិត ។ ការហ្វឹកហ្វឺនអប់រំធ្វើឱ្យបានប្រសើរឡើងវិញនេះ អាចជួយមនុស្សឱ្យខំប្រឹងប្រែងអស់ពីកម្លាំង និងសមត្ថភាពរបស់គេ ។ គោលសំខាន់នៃការជួយនេះ គឺដើម្បីរក្សានៃភាពគោរពកិត្តិយស និងការទុកចិត្តទៅលើអ្នកដែលមានជំងឺខួរក្បាល ។

**តើកន្លែងណាដែលខ្ញុំអាចសុំជំនួយនេះ?**

វេជ្ជបណ្ឌិតព្យាបាលជំងឺទូទៅ: វេជ្ជបណ្ឌិតរបស់អ្នកអាចជួយបញ្ជូនអ្នកទៅកិច្ចបម្រើសមរម្យណាមួយ ឬផ្ដល់ថ្នាំពេទ្យដែលអាចព្យាបាលអ្នកជំងឺខួរក្បាលបាន។

**មន្ទីរព្យាបាលសហគមន៍ផ្នែកសុខភាពខួរក្បាល:** រាប់បញ្ចូលទាំងពេទ្យវិកលចរិត អ្នកចិត្តវិទ្យា គិលានុបដ្ឋាយិកា ផ្នែកវិកលចរិត អ្នកព្យាបាលរោគលើការងារបុគ្គលិកសង្គមកិច្ច ។ បុគ្គលិកទាំងនេះផ្ដល់ជូនជំនួយក្នុងសណ្ឋានផ្សេងៗគ្នាទៅអ្នកដែលមានជំងឺខួរក្បាល និងឬក្រុមគ្រួសាររបស់គេ។ នៅតាមមជ្ឈមណ្ឌលខ្លះមានបុគ្គលិកដែលអាចទៅមើលអ្នកជំងឺដល់ផ្ទះ ។ នៅតាមមន្ទីរព្យាបាលខ្លះមានផ្ដល់ជូនកិច្ចសម្រាប់បម្រើសម្រាប់ពេលជាបន្ទាន់ ។

**មន្ទីរពេទ្យវិកលចរិត :** ប្រសិនបើមាននរណាម្នាក់ឈឺខ្លាំងអ្នកនោះត្រូវការព្យាបាលនៅតាមមន្ទីរពេទ្យ ។ អ្នកជំងឺនោះអាចបញ្ជូនទៅឱ្យស្នាក់នៅក្នុងមន្ទីរពេទ្យដោយមិនស្ម័គ្រចិត្តនេះ ប្រសិនបើមើលទៅឃើញថា អ្នកជំងឺអាចឱ្យមានគ្រោះថ្នាក់ដល់ខ្លួនឯងផ្ទាល់ ឬទៅដល់អ្នកឯទៀត ។ នៅពេលណាជំងឺនេះត្រូវបានបញ្ជូនទៅមន្ទីរពេទ្យ ហើយនោះសុខភាពខាងផ្នែកខួរក្បាលរបស់ជននោះនឹងត្រូវពិនិត្យមើលជាប្រក្រតី ។ គោលបំណងនៃការបញ្ជូនឱ្យទៅស្នាក់នៅតាមមន្ទីរពេទ្យនោះ គឺដើម្បីរក្សាសុខភាពខាងផ្នែកខួរក្បាលរបស់អ្នកជំងឺឱ្យបានជាសះស្បើយឡើងវិញយ៉ាងឆាប់ និងដើម្បីឱ្យគេវិលត្រឡប់ទៅផ្ទះវិញ ។

**កិច្ចបម្រើដែលមិនមែនជារបស់រដ្ឋ :** គឺចាត់ចែងឡើងដោយសហគន៍នៅតាមតំបន់ ។ គោលបំណងយ៉ាងសំខាន់របស់កិច្ចបំរើនេះ គឺថាដើម្បីជួយអ្នកជំងឺខួរក្បាលឱ្យរស់នៅដោយពឹងផ្អែកលើខ្លួនឯងដែលអាចធ្វើបាន ។ ឧទាហរ៍គេអាចជួយអ្នកជំងឺឱ្យមានមិត្តភក្តិថ្មី ឬពេលខ្លះទៀតជួយផ្ដល់ទីលំនៅ ។ គេមិនអាចជួយផ្ដល់ការព្យាបាល ឬថ្នាំពេទ្យឡើយ ។

**តើបញ្ហារបស់ខ្ញុំនឹងត្រូវបានរក្សាទុកជាសម្ងាត់ ឬទេ?**

នៅពេលណាទៅជួបអ្នកបច្ចេកទេសខាងផ្នែកសុខភាពព័ត៌មានស្ដីពីបញ្ហារបស់អ្នក និងមិនត្រូវបញ្ជូនឱ្យអ្នកណាផ្សេងទៀតដឹងឮដោយគ្មានការអនុញ្ញាតិពីនាក់ឡើយ ។ ប្រសិនបើមានអ្នកបកប្រែនៅពេលនោះ អ្នកបកប្រែនោះក៏ត្រូវតែរក្សាព័ត៌មាននោះជាសម្ងាត់ដែរ ។ វាជាការសំខាន់ចំពោះអ្នកដែលទទួលការរងទុក្ខដោយជំងឺខួរក្បាលត្រូវទទួលការព្យាបាលដើម្បីឱ្យជាសះស្បើយ ។ ប្រសិនបើទុកជំងឺនេះយូរទៅនេះវានឹងត្រូវការចំណាយពេលយូរដើម្បីព្យាបាលអ្នកជំងឺនេះឱ្យជាសះស្បើយ ៕




វេជ្ជបណ្ឌិត យ័ន ម៉ាយរ៉ូ គ្រូពេទ្យជំនាញអាចជួយលោកអ្នក
ឲ្យស្រួលខ្លួនឡើងវិញ ហើយនៅស្រួលខ្លួនរហូតបាន



Yuan Mirow, MD
*Internal Medicine*

**មន្ទីរពេទ្យអាញស្តាញ មានសេចក្តីរីករាយ នឹងជូនដំណឹងថា វេជ្ជបណ្ឌិត ម៉ាយរ៉ូ ឥឡូវនេះទទួលព្យាបាលអ្នកជម្ងឺថ្មីហើយ**

មានសញ្ញាប័ត្រមកពីសាលាពេទ្យនៅ យូណាន វេជ្ជបណ្ឌិត ម៉ាយរ៉ូ បានបំពេញការសិក្សានៅក្នុងមន្ទីរពេទ្យ"អេពីស្កុពុល" ហ្វីឡាដែលហ្វៀ នាងនិយាយភាសាចិន ម៉ង់ឌ្រិន និង ខនតុង មុខជំនាញរបស់នាងគឺថែទាំសម្រាប់ការពារក្នុងករណី:

- ជម្ងឺហឺត
- ឈឺសរសៃបេះដូង
- ការចិញ្ចឹមខ្លួន/ជំងឺធាត់
- ទឹកនោមផ្អែម
- អ្វីដែលទាក់ទងសុខភាពស្ត្រី

វេជ្ជបណ្ឌិត ម៉ាយរ៉ូ គឺជាផ្នែកមួយនៃប្រព័ន្ធទាក់ទងថែសុខភាពរបស់ពេទ្យអាញ ស្តាយ ដែលមានឈ្មោះល្បី ថាបានព្យាបាលយ៉ាងល្អបំផុត ចំនួន១៤០ឆ្នាំមកហើយ ។ អាញស្តាញ ទទួលបានចំណាត់ថ្នាក់ទី២៥នៃការស្ទាបស្ទង់មតិទស្សនាវដ្តីនៃវេជ្ជបណ្ឌិតកំពូលឆ្នាំ២០១១ ហើយជាមន្ទីរពេទ្យតែមួយដែលប្រព័ន្ធសុខភាពបានឈ្នះការកោតសរសើរដំបូងគេ អំពីគុណភាព ។

ចង់ជួបវេជ្ជបណ្ឌិត ម៉ាយរ៉ូ សូមទូរស័ព្ទទៅ 215-248-0112

1-800-EINSTEIN | www.einstein.edu




©2011 EHN PCN-2429-11

# ប្រវត្តិរណសិរ្សជាតិរំដោះប្រជាពលរដ្ឋខ្មែរ រ.ជ.រ.ប.ខ លោកតា ស៊ីន សាន




**ដោយ : ម៉ម យីន**

●●●៣-ដោយសារតែកងទ័ពយួននៃប្រទេសនីមួយៗ មានបេសកកម្មធំបំផុត ត្រូវតែការពារទ្រទ្រង់ប្រទេសជាតិ និងផលប្រយោជន៍សំខាន់ៗ របស់ប្រទេសជាតិគេ ដូចជាសន្តិសុខប្រជាពលរដ្ឋពង្រីងពង្រីកសេដ្ឋកិច្ច នយោបាយ និងអ្វីៗទាំងអស់ដែលជារបស់ជាតិគេ ទើបកងទ័ពនេះត្រូវតែបំពេញភារកិច្ច និងប្រកាន់យ៉ាងខ្ជាប់ខ្ជួន នូវសតិស្មារតី មនសិកាស្រឡាញ់ជាតិគេយ៉ាងពេញទំហឹងដែរ ។

៤-កងទ័ពជាថាមពលមួយធំសំខាន់ណាស់ ក្នុងការការពារទ្រទ្រង់នយោបាយរបស់រដ្ឋាភិបាល ដើម្បីធ្វើឱ្យបានសម្រេចជោគជ័យក្នុងគម្រោងផែនការដែលគេចង់បាន ដូច្នេះកងទ័ពនេះហើយជាកត្តាកំណត់មួយច្បាស់លាស់ពិតប្រាកដណាស់ ។ កាលបើកងទ័ពបានស្ថិតនៅគាំទ្រក្នុងជាតិសាសន៍ណាហើយ មេដឹកនាំរដ្ឋាភិបាលនៃប្រទេសនោះ ប្រាកដជាមានជំហររឹងមាំហើយចង់ធ្វើអ្វីក៏បានសម្រេចជោគជ័យជាស្ថាពរដែរ ។

៥-កងទ័ពយួនក្រហមបានបំពេញបេសកកម្មដ៏វិសេសនេះ ទទួលបានជោគជ័យល្អប្រសើរបំផុតធ្វើឱ្យមតិជាតិខ្មែរ និងអន្តរជាតិយល់ព្រមទទួលស្គាល់ថា ជាកងទ័ពប្រទេសមួយបានជួយរំដោះសង្គ្រោះប្រជាពលរដ្ឋនៃប្រទេសមួយ គឺខ្មែរហើយត្រូវតែបានរួចផុតពីការចោទប្រកាន់ទាំងអស់ពីសាធារណជនដទៃទៀត ។ ទោះបីជាការចោទប្រកាន់នោះមានលក្ខណៈភស្តុតាងត្រឹមត្រូវពិតប្រាកដយ៉ាងណាក៏ដោយ ។

សរុបសេចក្តីទៅ ការសម្លាប់ប្រជាពលរដ្ឋខ្មែររាប់ច្រើនលាននាក់ក៏ដោយ ការខូចខាតខ្ទេចខ្ទីហេដ្ឋារចនាសម្ព័ន្ធគ្រប់វិស័យនៅក្នុងប្រទេសខ្មែរក៏ដោយ ការប្រើយុទ្ធវិធី ល្បិចកល ដើម្បីឈានទៅដល់ការរឹបអូសពង្រីកទឹកដីរបស់ប្រទេសយួនក្រហមក៏ដោយ ក៏ពុំអាចមានបណ្តាជនជាតិខ្មែរគ្រប់មជ្ឈដ្ឋានមានសិទ្ធិសេរីភាពក្នុងការលើកឡើងនូវរឿងពិតទាំងនេះមកនិយាយ ធ្វើវិភាគពិចារណា និងផ្សព្វផ្សាយទៅបានដែរនាសព្វថ្ងៃនេះ ។

បើសិនណាជាជនជាតិខ្មែរណាមួយហ៊ានលើករឿងនេះឡើង ជនជាតិខ្មែរនោះ ឬជនជាតិបរទេសដែលស្រឡាញ់យុត្តិធម៌នោះ នឹងត្រូវអ្នកដឹកនាំរដ្ឋាភិបាលខ្មែរចាត់វិធានការណ៍យ៉ាងតឹងរឹង និងខ្លាំងក្លាបំផុតដោយប្រើវិធីសម្ងាត់ ឬដោយវិធីស្របច្បាប់ ដើម្បីបំបាត់កំចាត់កំចាយសកម្មភាពស្នេហាជាតិនោះ ដែលសកម្មជនស្នេហាជាតិ តែងតែទទួលរងទុក្ខរហូតមកដល់សព្វថ្ងៃ ។

**គ-ការពារកិច្ច និងសិទ្ធិសេរីភាពជាតិខ្មែរត្រូវតែបំពេញ**

-តើត្រូវឱ្យសកម្មជនស្នេហាជាតិខ្មែរទាំងអស់ត្រេះរិះរកវិធីណាយកមកប្រើ ដើម្បីជួយការពារទ្រទ្រង់ប្រទេសជាតិមាតុភូមិ និងជនជាតិសាសន៍ខ្មែរឱ្យបានគង់វង្សស្ថិតស្ថេរ ចិរកាលជានិរន្តរ៍តទៅបានឬទេ?

-តើត្រូវឱ្យប្រជាពលរដ្ឋខ្មែរស្នេហាជាតិ ធ្វើតម្រាប់តាមបងប្អូនជនជាតិខ្មែរ ដែលជាម្ចាស់ស្រុកនៃដែនដីកម្ពុជា ហើយសព្វថ្ងៃត្រូវបានជនជាតិយួនរឹបអូសយកទៅធ្វើជាទឹកដីយួនអស់រលីងនោះបានឬទេ?

ពីព្រោះសព្វថ្ងៃនេះ បងប្អូនរួមឈាមខ្មែរកម្ពុជាក្រោមបានបង្កើតសហព័ន្ធជាតិខ្មែរកម្ពុជាក្រោមមួយ ដើម្បីប្តឹងទាមទារទៅដល់អង្គការសហប្រជាជាតិឱ្យជួយរកយុត្តិធម៌ ឱ្យដល់ជនជាតិខ្មែរកម្ពុជាក្រោមផង ដែលកំពុងរស់នៅក្រោមការគ្រប់គ្រងត្រួតត្រារបស់រដ្ឋាភិបាលយួនក្រហម?

បើសិនណាជាធ្វើមិនបាន តើបណ្តាលមកពីហេតុអ្វី?

ពីព្រោះសព្វថ្ងៃនេះ ជនជាតិខ្មែរស្នេហាជាតិពិតប្រាកដបានតាមដាន និងពិនិត្យមើលឃើញច្បាស់ណាស់ថា អំពើ និងការប្រព្រឹត្តរបស់កងទ័ពនៃរដ្ឋាភិបាលយួនក្រហម បានចូលមកវាយលុកលុយប្រទេសខ្មែរនាឆ្នាំ១៩៧៨នោះ រួចហើយចេះតែធ្វើ និងប្រព្រឹត្តបន្តៗមកទៀតរហូតមកដល់សព្វថ្ងៃនេះ គឺសុទ្ធសឹងតែចេញមកពីគម្រោងផែនការជនជាតិយួន ដែលបានរៀបចំមករាប់រយឆ្នាំហើយ ដូចគ្នានឹងប្រវត្តិសាស្ត្រខ្មែរបានចារឹកទុកឱ្យជនជាតិខ្មែរជំនាន់ក្រោយតៗមក បានដឹងរួចហើយៗបន្តមកដល់សព្វថ្ងៃ ។ ផែនការទាំងនោះឃើញលេចចេញមកដូចគ្នាបេះបិទតែម្តង ។



តើហេតុអ្វីបានជាជនជាតិខ្មែរជំនាន់នេះ ពុំព្រមទទួលជឿថាប្រទេស និងជាតិពូជសាសន៍ខ្មែរកំពុងត្រូវបាត់បង់បន្តិចម្តងៗហើយ ហើយទៅអនាគតមិនយូរប៉ុន្មានទេប្រទេស និងជនជាតិពូជសាសន៍ខ្មែរនឹងក្លាយទៅជា កម្ពុជាក្រោមទី២ទៀតជាពិតប្រាកដជៀសពុំរួចឡើយ ។ សូម្បីតែ សម្តេចសីហនុ ជាអតីតព្រះមហាក្សត្រខ្មែរ ដែលបានឡើងសោយរាជ្យតាំងពីឆ្នាំ១៩៤១ តាំងពីព្រះអង្គមានជន្មាយុ១៧ឆ្នាំ ក៏ព្រះអង្គបានថ្លែងតាមបណ្តាញអាន់ធើណែត (Internet) របស់ព្រះអង្គថា "ព្រះអង្គមានព្រះទ័យអាណិតអាសូរប្រជារាស្ត្រខ្មែរកូនចៅ ចៅទួតព្រះអង្គណាស់ ព្រះអង្គបានដឹងថា សេចក្តីទុក្ខវេទនារបស់កូនចៅខ្លាំងក្លាណាស់ ប៉ុន្តែព្រះអង្គពុំអាចជួយ (តទៅលេខក្រោយ)

## តមកទំព័រទី ១២ លិខិតឆ្លើយតប

ដោយសារតែ នាយករដ្ឋមន្ត្រី ហ៊ុន សែន បានទាត់ត្រវាត់ចោលសន្ធិសញ្ញាអន្តរជាតិ នាថ្ងៃទី២៣ ខែតុលា ឆ្នាំ១៩៩១ នៅទីក្រុងប៉ារីសប្រទេសបារាំងនោះ ឱ្យចេញបាត់អស់រលីងពីប្រទេសកម្ពុជា ។

ខ្ញុំសូមថ្លែងអំណរអរគុណដ៏ជ្រាលជ្រៅ និងសូមសេចក្តីអនុគ្រោះមេត្តាអភ័យទោសដល់រូបខ្ញុំ ដែលជាកូនខ្មែរមួយរូបបានឆ្លងកាត់នូវព្រឹត្តិការណ៍ធំៗ ប្រកបដោយការរងទុក្ខវេទនា ខ្លោចផ្សា ពុំសូវមានពេលបានសុខសាន្ត ក្នុងកាយក្នុងចិត្តល្មមសមគួរនោះឡើយ ។ ហើយខ្ញុំសូមសំដែងសេចក្តីកោតសរសើរដល់លោកស្រី អស់លោកជាសហព្រះរាជអាជ្ញា សហចៅក្រម ដែលបានបំពេញបេសកកម្មដ៏វិសេសវិសាល ក្នុងការស្វែងរកការពិត និងគតិយុត្តិធម៌នៅក្នុងអង្គជំនុំជំរះវិសាមញ្ញ ក្នុងតុលាការកម្ពុជានេះ ដែលជាភព្វព្រេងសំណាង ពុំអាចរកបានក្នុង១ជីវិតនៃមនុស្សម្នាក់ៗ ជាជាតិខ្មែរ និងអន្តរជាតិ ។

ទោះបីខ្ញុំបានអស់សង្ឃឹមនៅក្នុងតុលាការរបស់ មនុស្សលោកក៏ពិតមែន ប៉ុន្តែខ្ញុំនៅតែមានសង្ឃឹមយ៉ាងមាំទៅលើតុលាការរបស់ស្តេចសក្កទេវរាជ ជា ស្តេចនៃទេវតា ព្រះអង្គ គឺជាស្តេចចៅក្រមដ៏មានគតិយុត្តិធម៌ សុច្ចរិតទៀងត្រង់បំផុត ស្អាតស្អំបរិសុទ្ធបំផុត ព្រះអង្គត្រូវតែបើកអង្គជំនុំជំរះវិសាមញ្ញក្នុងតុលាការព្រះអង្គ ដើម្បីជំនុំជំរះកាត់ទោសជនប្រព្រឹត្តអំពើមហា ឧក្រិដ្ឋកម្មកាប់សម្លាប់មនុស្សជាតិខ្មែរ ទាំងអស់ណា ដែលបាននឹងកំពុងតែប្រព្រឹត្តអំពើមហាឧក្រិដ្ឋកម្មនេះ ជាលំដាប់មកនោះ ហើយនៅតែបន្តធ្វើពុំព្រមឈប់ឈរសោះនោះឡើយ ។

សូមលោកស្រី អស់លោកទទួលនូវសេចក្តីគោរព រាប់អានដោយស្មោះ និងមេត្រីភាពពីខ្ញុំ ។ ***សូមអរគុណ***

***ក្រុងហ្វីឡាដែលហ្វីយ៉ា ថ្ងៃទី២៤ ខែមករា ឆ្នាំ ២០១២***

[signature]

***ម៉ម យីន***

## តមកទំព័រទី ១៣ វិទ្យាស្ថាន EIC ព្យាករថា កំណើនសេដ្ឋកិច្ច...

បានកើនដល់៧.៨ភាគរយកាលពីឆ្នាំមុន ប៉ុន្តែការថយចុះតម្រូវការសម្ល្បៀកបំពាក់នៅបរទេសគួបផ្សំជាមួយនឹងការធ្លាក់ចុះតម្រូវការផលិតផលកសិកម្មមិនទាន់កែច្នៃមានន័យថា កំណើននៅឆ្នាំនេះនឹងបានត្រឹម "មធ្យម" ប៉ុណ្ណោះ ។

របាយការណ៍នេះបានលើកឡើងថា "ដោយសារតែការធ្លាក់ចុះតម្រូវការផលិតផលកសិកម្មមិនទាន់កែច្នៃទូទាំងពិភពលោកជាពិសេសគឺស្រូវ និងដំឡូងមីនៅតម្លៃផលិតផលនៅក្នុងទីផ្សារអន្តរជាតិ និងក្នុងស្រុកធ្លាក់ចុះនៅឆ្នាំ២០១២នេះ ។ ហេតុដូច្នេះហើយគេរំពឹងថា តម្លៃនឹងធ្លាក់ចុះតាមនិន្នាការនេះ ដែលប្រការនេះទំនងជានឹងប៉ះពាល់ជាអវិជ្ជមានដល់ប្រាក់ចំណូលរបស់កសិករ" ។

ប៉ុន្តែរបាយការណ៍នេះក៏បានព្យាករថា កំណើនក្នុងវិស័យកសិកម្មនឹងកើនឡើងដល់៤.៥ភាគរយនៅឆ្នាំនេះ បើធៀបនឹង៣.៣កាលពីឆ្នាំមុន ។ កំណើនត្រឹម៣.៣ភាគរយនេះត្រូវបានសន្មត់ថា ដោយសារការជន់លិចធ្ងន់ធ្ងរកាលពីចុងឆ្នាំ២០១១ ។

របាយការណ៍នេះបានបន្តទៀតថា "តាមការរំពឹងថាស្ថានភាពសេដ្ឋកិច្ចមិនល្អនៅក្រៅប្រទេស នឹងធ្វើឱ្យការនាំចេញផលិតផលរបស់កម្ពុជាធ្លាក់ចុះ ជាពិសេសគឺវាយនភណ្ឌ និងសម្លៀកបំពាក់ អង្ករ ដំឡូងមី និងសេវាកម្មទេសចរណ៍" ។

លោក សុខ ហាង ប្រធានវិទ្យាស្ថាន EIC បានឱ្យដឹងតាមរយៈរបាយការណ៍នេះថា ការនាំចូលរួមពន្ធពីកម្ពុជាទៅកាន់សហភាពអឺរ៉ុបនឹងបន្តជំរុញបង្កើនកំណើនសេដ្ឋកិច្ច ។

ប៉ុន្តែលោកក៏បានមានប្រសាសន៍ផងដែរថា វិស័យកសិកម្មនៅកម្ពុជា និងប្រឈមនឹងការប្រកួតប្រជែងយ៉ាងខ្លាំងជាមួយទីផ្សារនាំចេញដទៃទៀត ៕

## Economy May Grow 6.2% in 2012...

**Continued from Page 13**

global weakening demand for raw agricultural produce, especially rice and cassava, the year 2012 will be a bearish year for the international market prices and local prices," the report said. "[P]rices are thus expected to follow a downward trend, which is likely to negatively to affect farmers' income."

Still, the report estimated growth in the agricultural sector to reach 4.5 percent this year compared with 3.3 percent last year, a figure that was attributed to severe flooding in late 2011.

"The dismal outlook of the external economic environment is expected to weaken export demand on Cambodian products, including especially textile and garment, milled rice, cassava, and tourism services," the report said.

EIC President Sok Hach said in the report that duty-free imports from Cambodia to the European Union would continue to fuel growth. But also said Cambodia's agriculture sector would face stern competition from other exporting markets.

"[The duty-free imports] alone will not be enough to support the rice export sector that faces strong competition from India and Pakistan," Mr. Hach said. "Cambodia needs to be more competitive."

The report also estimated that the rubber manufacturing sector would grow 9.2 percent and the construction sector 7.2 percent.

## តមកទំព័រទី ១៣ មេអង្គរក្ស លោក ជា ស៊ីម ត្រូវផ្តន្ទាទោស...

ខ្ញុំនឹងធ្វើការប្តឹងឧទ្ធរណ៍ " ។ លោកបានបដិសេធមិនធ្វើការបរិយាល្អិតល្អន់ថែមទៀតឡើយ ។

លោក ពុធ ធាវី មេធាវីរបស់លោក ចាន់ថន បានមានប្រសាសន៍ថា ក្រុមមេធាវីការពារក្តីបានគិតថា មានការក្លែងបន្លំឯកសារ ។

លោកបានមានប្រសាសន៍បន្ថែមទៀតថា "ការដាក់ទោសមកលើកូនក្តីរបស់ខ្ញុំ គឺហួសហេតុណាស់ ។ វាគ្មានភស្តុតាងលើការក្លែងលិខិតវាគ្មានភស្តុតាងលើការប្រើប្រាស់លិខិតក្លែងឡើយ" ។

លោក ធាវី បានបដិសេធចំពោះការចោទប្រកាន់ពីបទប្រើប្រាស់អាវុធ ដោយលើកឡើងថា ការរក្សាទុកអាវុធវាជារឿងធម្មតាទេ ចំពោះអ្នកមានឋានន្តរសក្តិធំនោះ ។

លោកបានបន្ថែមថា "សូមមេអង្គរក្សនៃថ្នាក់ដឹកនាំទាំងអស់ទាំងនគរបាល ទាំងកងរាជអាវុធហត្ថ និងកងទ័ពត្រូវតែប្រុងប្រយ័ត្ន ពីព្រោះ បើមេអង្គរក្សប៉ុណ្ណឹង មានកាំភ្លើងបីបួនប្រាំដើមនៅក្នុងផ្ទះ លោកអាចជាប់គុករហូតដល់១០ឆ្នាំ" ។

*ប្រែសម្រួលដោយ ចៅ ប៊ុនធី*




# ពីរដ្ឋបាលកុលសម្ព័ន្ធមករដ្ឋាភិបាលសម័យ

**ប្រែសម្រួលដោយ : គីម វិមល**

**១២.** សុន សេន (ខ្មែរក្រហម)

**ពីថ្ងៃ១៩ កក្កដា ១៩៩១ ដល់ ២៨ មករា ១៩៩៣**

សមាជិកក្រុមប្រឹក្សាជាតិជាន់ខ្ពស់ បានត្រូវដំឡើងជា១៣រូប ដោយក្រុមប្រឹក្សាជាតិនោះបានដំឡើងឋានៈសម្ដេចនរោត្តមសីហនុ ជាព្រះប្រមុខរដ្ឋ ហើយជាប្រធានលើភាគីទាំងអស់ ដែលចូលរួមជាសមាជិកក្រុមប្រឹក្សាជាតិជាន់ខ្ពស់នោះ។

ខាងគណបក្សហ្វ៊ុនស៊ិនប៉ិច បានបញ្ចូលលោក សម រង្ស៊ី គម្រប់ជា២រូប ក្នុងកូតារបស់ខ្លួនបន្ថែមឱ្យគ្រប់១៣រូប លើសមាភាពពីមុន។

**៦ មេសា ១៩៩២ :** ប្រជុំក្រុមប្រឹក្សាជាតិជាន់ខ្ពស់ CNS ដោយមានវត្តមានលោក អាកាស៊ី និងក្រុមស្ទួលនៃកិច្ចព្រមព្រៀងក្រុងប៉ារីស អាកាស៊ី បានស្នើឱ្យក្រុមខ្មែរក្រហមបើកតំបន់ពួកគេឱ្យអ៊ុនតាក់ ខៀវ សំផន បានទាមទារឱ្យមានការត្រួតពិនិត្យ ការដកទ័ពវៀតណាមចេញពីកម្ពុជាជាមុន ហើយនឹងការប្រមូលផ្ដុំនៃបក្សនីមួយៗ ដែលនេះមិនស្របតាមអត្ថន័យនៃកិច្ចព្រមព្រៀងក្រុងប៉ារីសទេ។

**៧-១២ មេសា :** CNS នាំសមាជិកទាំងអស់របស់ខ្លួនទៅធ្វើទស្សនៈកិច្ចនៅ ប៉េកាំង ដែលនៅទីនោះគេនាំគ្នាចេញសេចក្ដីថ្លែងការណ៍រួមថា "ឱ្យមានការអនុវត្តន៍យ៉ាងហ្មត់ចត់" នូវកិច្ចព្រមព្រៀង ។ ការបាត់ខ្លួននៃសមាជិកទាំងអស់របស់ CNS ពីកម្ពុជាបានត្រូវក្រុមស្ទួលជាច្រើនវាយតម្លៃថា "គឺជាការមិនទទួលខុសត្រូវ" ។

**៨ មេសា :** អ្នកភូមិបន្ទាយដែកបានក្រោកបះបោរ បន្ទាប់ពីមានការលក់ដីដោយក្រសួងកសិកម្មឱ្យទៅក្រុមហ៊ុនឯកជន ប៉ូលិសនៃរដ្ឋកម្ពុជាបានបង្ក្រាបយ៉ាងចាស់ដៃបណ្ដាលឱ្យស្លាប់អ្នកភូមិម្នាក់ និងរបួសធ្ងន់ម្នាក់ទៀត។

**១៨-២១ មេសា :** ប្រជុំ CNS ដែលនៅពេលនោះអង្គប្រជុំសម្រេចឱ្យកម្ពុជាគោរពច្បាប់អន្តរជាតិ ស្ដីពីសិទ្ធិមនុស្ស ខៀវ សំផន ជំទាស់នឹងការបង់វិភាគទាន១១១ដុល្លារ សម្រាប់ដំណើរការរដ្ឋបាលនៅនឹងកន្លែង។

**១ ឧសភា :** នៅ១ខែមុនដល់ដំណាក់ការណ៍ទី២ ដែលតម្រូវឱ្យមានទ័ពអ៊ុនតាក់គ្រប់ចំនួន គឺ១៥,៩០០នាក់ ពេលនោះទ័ពមួកខៀវមានតែ៤000នាក់ប៉ុណ្ណោះ។

**៥-៦ ឧសភា :** ខ្មែរក្រហមរំលោភការឈប់បាញ់គ្នានៅកំពង់ធំ។

**៧ ឧសភា :** ធនាគារអភិវឌ្ឍន៍អាស៊ីបានចេញរបាយការណ៍លំអិតពីស្ថានភាពប្រទេស ហើយឱ្យយោបល់ថា មានភាពចាំបាច់នឹងជួយកម្ពុជាជាបន្ទាន់សេចក្ដីរាយការណ៍នោះបានផ្ដល់តុល្យភាពបញ្ចើចបញ្ចើរ ដល់សមិទ្ធិផលគណបក្សប្រជាជន និងរដ្ឋកម្ពុជាដល់ខែមិថុនា សេចក្ដីរាយការណ៍នោះបានត្រូវទទួលការគាំទ្រពីធនាគារពិភពលោក។

**តទៅលេខក្រោយ**

MARCOTTE LAW FIRM
ក្រុមហ៊ុនមេធាវី Marcotte
45 MERRIMACK STREET
LOWELL, MASSACHUSETTS
(978) 458-1229
• សេចក្ដីអន្តរាយដល់បុគ្គល
• ច្បាប់ធានារ៉ាប់រង
• សំណងបុគ្គល
• ការរំលោភបទព្រហ្មទណ្ឌ
• ពិការភាពដោយសន្តិសុខសង្គម
• គ្រោះថ្នាក់ចរាចរណ៍
• បទព្រហ្មទណ្ឌផ្លូវភេទ និងថ្នាំញៀន
• គ្រោះថ្នាក់នៅការដ្ឋាន
• ច្បាប់គ្រួសារ និងផែនការអចលនទ្រព្យ
• បំណុលអចលទ្រព្យ
• បណ្ដឹងវិវាទទូទៅ
• បើកបរនៅពេលស្រវឹង និងប្រព្រឹត្តបទល្មើសពេលធ្វើចរាចរណ៍
មានបុគ្គលិកនិយាយភាសាខ្មែរលោកអ្នកអាចហៅទូរស័ព្ទ
មកក្រុមហ៊ុនយើងខ្ញុំដើម្បីពិគ្រោះ
(978) 458-1229
www.marcottelawfirm.com




# ពុទ្ធប្បវត្តិអមដោយរូបភាព

❖ រូបភាព និងរឿងដើមជាភាសាថៃ ដោយ គុណាប៉ាយុតា
❖ បកប្រែជាភាសាអង់គ្លេស ដោយ ហ្សិត .អេ.លី
❖ ផាត់ពណ៌ដោយ យ៉ាន់ ហ្វាលី
❖ បកប្រែជាភាសាខ្មែរដោយភិក្ខុ គង់ អាំ

**១៧៨**-កាលដែលគំរោងធ្វើឃាតព្រះអង្គមិនបានសំរេច. ទេ វទត្តសំរេចចិត្តចាត់វិធានការណ៍នេះដោយខ្លួនឯងផ្ទាល់ ។ ទេវទត្តពួនសម្ងំចាំនៅម្ខាងភ្នំគិជ្ឈកូដខាងលើផ្លូវដែលព្រះអង្គតែងនិមន្តជាប្រក្រតីជិតកន្លែងដែលព្រះអង្គគង់នៅ ។ ល្ងាចថ្ងៃមួយចំពេលដែលព្រះអង្គកំពុងនិមន្តតាមផ្លូវនោះ. ទេវទត្តដែលបានលាក់ខ្លួនពួនអាត្មាចាំរួចជាស្រេចនៅខាងលើភ្នំក៏បានរុញប្រមៀលដុំថ្មមួយដុំយ៉ាងធំទំលាក់ចុះមកក្រោមបំណងធ្វើគតព្រះពុទ្ធអង្គ ។ ប៉ុន្តែដុំថ្មដែលប៉ងឱ្យធ្លាក់ចំព្រះសិរៈព្រះអង្គភ្លាមនោះ ក៏បានបែកខ្ចាយទៅជាដុំតូចៗអស់. មានតែបំណែកថ្មស្រួចតូចមួយប៉ុណ្ណោះដែលធ្លាក់ប៉ះចំព្រះបាទព្រះអង្គបណ្ដាលឱ្យចេញលោហិតបន្តិចបន្តួច ប៉ុន្តែគ្មានគ្រោះថ្នាក់អ្វីធ្ងន់ធ្ងរឡើយ ។ ព្រះពុទ្ធទ្រង់ក៏យាងត្រឡប់ទៅកាន់វត្តវិញ ហើយទ្រង់បានទទួលការព្យាបាលពីគ្រូពេទ្យដ៏ល្បីល្បាញម្នាក់ឈ្មោះ **អាជីវក** ។

**១៧៩**-ផែនការធ្វើពុទ្ធឃាតមិនបានសំរេចម្ដងហើយម្ដងទៀត ប៉ុន្តែទេវទត្តនៅតែព្យាយាមបន្តបង្កគ្រោះថ្នាក់ដល់ព្រះពុទ្ធអង្គយ៉ាងអន្ទះសារ ។ ម្ដងនេះទៀត ផែនការរបស់គាត់គឺព្រលែងដំរីមួយដ៏កាចសាហាវក្រៃពេក ឈ្មោះនាឡាគិរី ក្នុងបំណងឱ្យព្រេចព្រះពុទ្ធជាម្ចាស់ឱ្យអស់ព្រះជន្មនៅតាមផ្លូវនៅពេលព្រះអង្គកំពុងនិមន្តបិណ្ឌបាត្រក្នុងក្រុងរាជគ្រឹះ ។ ទោះជាយ៉ាងនេះក្ដី. ពេលដែលដំរីដ៏កំណាចនេះចូលទៅដល់ចំពោះព្រះភ័ក្ត្រព្រះអង្គវាបែរជាមិនហ៊ានព្រេចព្រះអង្គដូចដែលទេវទត្ត សង្ឃឹមទុកឡើយ មិនតែប៉ុណ្ណោះ វាត្រឡប់ជាស្លូតបាក់បបខ្លួបខ្លាចលែងកាចទៅវិញ ដោយសារតែព្រះវិជិតមារជាម្ចាស់ទ្រង់ផ្សាំងវាដោយមេត្តាបារមីរបស់ព្រះអង្គ ។ ក្រោយៗមកទៀត ទេវទត្តក៏មិនអាចធ្វើអ្វីបានទាល់តែសោះក្រៅតែពីឈប់តាមសំលាប់ព្រះអង្គ ប៉ុន្តែគាត់នៅតែមានបំណងបំបែកសង្ឃឱ្យបែកគ្នាដដែល ។

**១៨០**-ដើម្បីដាក់ការគាបសង្កត់ដល់ភិក្ខុសង្ឃទាំងឡាយនូវអ្វីដែលខ្លួនបានប្រព្រឹត្តកន្លងមក គឺមានការតឹងរឹងជាងអ្វីដែល (វិន័យ) ព្រះពុទ្ធអង្គបានបង្រៀនកន្លងមក. ទេវទត្តក៏ទៅជួបព្រះសាស្ដាម្ដងទៀត សំដែងអាកប្បកិរិយាបីដូចជាលោកមិនធ្លាប់ធ្វើសង្ឃភេទម្ដងណាឡើយ ។ ភិក្ខុទេវទត្តបានស្នើសុំឱ្យព្រះបរមគ្រូរឹតបន្តឹងវិន័យឱ្យកាន់តែតឹងថែមទៀត ឱ្យដូចពួកបព្វជិតនិកាយផ្សេងៗឯទៀត. ដូចជាមិនអនុញ្ញាតឱ្យភិក្ខុគង់នៅក្នុងកុដិប្រក់បិទបាំងដោយដំបូល. តែត្រូវនៅក្នុងទីវាលក្រោមដើមឈើក្នុងព្រៃតែប៉ុណ្ណោះ ។ លោកក៏បានសុំទៀតថាឱ្យព្រះអង្គដាក់បំរាមកុំឱ្យភិក្ខុសង្ឃទាំងឡាយឆាន់សាច់គ្រប់ប្រភេទ. លោកសុំព្រះអង្គថា បើភិក្ខុអង្គណាមួយល្មើសនឹងវិន័យនេះត្រូវតែបណ្ដេញចេញពីសង្ឃ ។

**១៨១**-ព្រះសម្មាសម្ពុទ្ធទ្រង់មិនយល់ព្រមជាដាច់ខាតចំពោះការស្នើសុំរបស់ទេវទត្ត. តែទ្រង់គ្រាន់តែត្រាស់តបថា : "ប្រសិនបើភិក្ខុអង្គណាពេញចិត្តគង់នៅទីវាល ឬក្រោមដើមឈើភិក្ខុនោះ ចូរនៅបានតាមសប្បាយតែបើភិក្ខុអង្គណាមិនចង់នៅទីដូច្នេះទេ ភិក្ខុនោះអាចជ្រើសរើសនៅទីណាមួយក៏បានតាមដែលទាយកប្រគេន" ។ ដើម្បីឱ្យមានលក្ខណៈស្រប តាមអធ្យាស្រ័យសុំខ្លះៗរបស់ទេវទត្តព្រះមហាករុណាក៏ទ្រង់បញ្ញត្តិវិន័យដែលមានលក្ខណៈប្រហាក់ប្រហែលគ្នាដែរថា : "បើភិក្ខុអង្គណាប្រាថ្នាចង់ឆាន់អាហារភោជនដែលបានមកពីដើរបិណ្ឌបាត្រ. ឬស្លៀកដណ្ដប់ចីវរធ្វើពីបន្ទះសំពត់ដែលរើសបានមកពីក្នុងព្រៃ ឬគំនរសំរាម (សំពត់បង្សុកូល) ឬឆាន់តែបន្លែមិនឆាន់សាច់.ភិក្ខុអង្គនោះធ្វើដូច្នោះបានដោយឥតមានទាស់ខុសអ្វីឡើយ" ។ ចុងបញ្ចប់ព្រះបរមគ្រូទ្រង់ទូន្មានទេវទត្តថា "ចូរអ្នកកុំមានបំណងអ្វីមួយធ្វើឱ្យសង្ឃបែកបាក់គ្នាឱ្យសោះ ព្រោះថា ធ្វើដូច្នោះអ្នកនឹងត្រូវទទួលផលអកុសលនេះវិញ មិនខានឡើយ" ។ (**នៅមានតលេខក្រោយ**)

❖ Original Illuatration and Naration in Thai by Gunapayuta.
❖ Translation into English by A Lu.
❖ Coloring by Yann Fang Lee
❖ Translation into Khmer by Bhikkhu Kong Am.



178-When all plots to kill the Buddha by using other people failed, Devadatta decided to take matters into his own hands and do it himself. He waited on the side of Grdharakuta Mountain above a road near the Buddha's residence, which the Buddha often used to go on. One evening, just as the Buddha was walking, Devadatta, hiding above, pushed a huge stone down the hillside, intending to kill the Buddha. But the stone, which was aimed at the Buddha's head, suddenly broke into many small pieces; only one sharp fragment hit the Buddha's foot, causing some bleeding but no serious damage. The Buddha returned to the monastery and received treatment from the physician Jivaka.



179-Again his deadly plot had failed, but Devadatta still continued eagerly to do harm to the Buddha. This time his plan was to set loose the wild elephant Nalagiri, in order to kill the Buddha on the road, which the Buddha took when he went out for alms at Rajagrha. However, when the wild elephant approached the Buddha, it failed to act as Devadatta had expected, but on the contrary, became calm, for it was tamed by the Buddha´s enormous compassion. Thereafter, Devadatta could do nothing but stopped planning to murder the Buddha, yet he still intended to disrupt the Sangha.



180-In order to give the bhiksus the impression that what he practiced was even stricter than what the Buddha taught, Devadatta once again went to see the Buddha, acting as if he had never even tried to disrupt the Sangha. He requested the Buddha to enforce a more stringent code of behavior, as other monastic sects did, such as not allowing bhiksus to live in covered houses, but only in the open, under trees in the forest. He also asked the Buddha to prevent bhiksus from eating any kind of meat, and he suggested to the Buddha that anyone who failed to observe this rule should be ousted from the Sangha.



181-The Buddha openly refused Devadatta´s request, saying: "If some bhiksus prefer to live in the open or under trees, they are free to do so; but if anyone does not like to do so, he may choose to live in whatever kind of accommodation his patron provides." Regarding Devadatta´s other suggestions for tightening up of the rules, the Buddha ruled in a similar manner: "If anyone wishes to eat only the food he has been offered, or to wear clothes made only of cloth strips picked up in the woods or from garbage piles, or to eat only vegetable and no meat, he is free to do so; but if someone does not wish to do so, he does not have to." Finally, Buddha warned Devadatta: "Do not attempt to disrupt the Sangha, for you will reap the evil fruits of such an attempt."

(Continued to after Issue)

# ជោគជតារាសីទាំង 12 ប្រចាំឆ្នាំថោះ

ជោគជតាប្រចាំសប្តាហ៍

**ឆ្នាំជូត**

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរ បានកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះ អ្វីៗច្រើនមានការប្រែប្រួល ពុំទៀងទាត់ឡើយ ដូច្នេះបើលោកអ្នកមានលក់ដីធ្លី ផ្ទះសម្បែង ឬវត្ថុមានតម្លៃផ្សេងៗ ចូរធ្វើលិខិតស្នាមជាលាយល័ក្ខអក្សរដោយមានចុះហត្ថលេខា ឬផ្តិតស្នាមមេដៃឲ្យបានត្រឹមត្រូវ ទើបទៅថ្ងៃមុខពុំមានបញ្ហាចោទឡើង ។ ចំពោះគូស្នេហ៍មានភាពស្និទ្ធស្នាលដូចប្រក្រតី ៕

**ឆ្នាំឆ្លូវ**

រាសីលោកអ្នកល្អជាមធ្យម ។ រាល់ការបំពេញការងារសព្វបែបយ៉ាង របស់លោកអ្នកនៅក្នុងរយៈពេល នេះមានតែភាពរលូនទៅមុខដូចធម្មតាទេ ប៉ុន្តែក្នុងនោះហាមមិនឲ្យលោកអ្នកឈឺឆ្អាលរឿងអ្នកដទៃឡើយ ប្រយ័ត្ននាំរឿងអំពល់ទុក្ខដាក់ខ្លួន ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញ មានការលូតលាស់ទៅមុខដោយសន្សឹមៗ ។ ឯបញ្ហាស្នេហា គូស្នេហ៍មានភាពផ្អែមល្ហែមដូចទឹកឃ្មុំ ៕

**ឆ្នាំខាល**

រាសីលោកអ្នកស្រុតចុះខ្លាំង ។ លោកអ្នកច្រើនមានអារម្មណ៍វឹលវល់ ទ័លគំនិតរកគិតអ្វីមិនលេចឡើយ ហើយបើទោះបីជាលោកអ្នកបានបំពេញកិច្ចការណាមួយហើយក៏ដោយ ក៏ពុំបានសំរេចលទ្ធផលអ្វីជាដុំកំភួនដែរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញ អាចមានមនុស្សទុច្ចរិតមកឆបោកយកទំនិញធ្វើឲ្យខាតបង់ផលដែរ ។ ឯបញ្ហាស្នេហា គូស្នេហ៍មិនសូវចេះស្តាប់បង្គាប់គ្នាទេ ៕

**ឆ្នាំថោះ**

រាសីលោកអ្នកស្រុតចុះខ្លាំង ។ លោកអ្នកអាចជួបនឹងទុក្ខសោក ដែលបណ្តាលមកពីការវិវាទគ្នានៅក្នុងបន្ទុកគ្រួសារ ឬក្រុមញាតិ ហេតុនេះចូរចេះអត់ធ្មត់ និងរម្ងាប់ចិត្តឲ្យបានត្រជាក់ កុំយកកំហឹងទៅទល់នឹងកំហល់ឲ្យសោះ ប្រយ័ត្នរឿងកាន់តែធ្ងន់ធ្ងរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញ មិនមានការរីកចំរើនទេ ។ ឯបញ្ហាស្នេហាគូស្នេហ៍ច្រើនពាក់មុខយក្សដាក់គ្នា ៕

**ឆ្នាំរោង**

រាសីលោកអ្នកមធ្យម ។ លោកអ្នកគួរព្យាយាមជំរុះចោលឲ្យអស់នូវរឿងសៅហ្មង និងបញ្ហាស្មុគស្មាញដែលធ្លាប់កើតមានកន្លងមក ពីព្រោះ ថ្ងៃនេះមានមនុស្សសំខាន់ចង់ជួយយិតយោងលោកអ្នកឲ្យផុតពីភាពក្រីក្រ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញ ផលកំរៃដែលរកបានមកអាចឲ្យលោកអ្នកសន្សំទុកដាក់បានខ្លះ ។ ឯបញ្ហាស្នេហា គូស្នេហ៍ច្រើនតែប្រចែប្រចណ្ឌគ្នាខុសរឿង ៕

**ឆ្នាំម្សាញ់**

រាសីលោកអ្នកស្រុតចុះខ្លាំង ។ លោកអ្នកអាចត្រូវចៅហ្វាយនាយ ឬមេការប្រកាន់ថ្នាក់ស្តីបន្ទោសប្រមាថកាតទានដោយប្រការផ្សេងៗ ធ្វើឲ្យមានការក្តៅចិត្តរកទប់មិនបាន ប៉ុន្តែយកល្អពុំគួរតបវិញឡើយ ព្រោះអាចយកពងមាន់ទៅជល់នឹងថ្ម ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញ អាចត្រូវខាតបង់ដល់ប្រាក់ដើមទុនផង ។ ឯបញ្ហាស្នេហា គូស្នេហ៍ច្រើនរកាំរកូសគ្នា ៕

**ឆ្នាំមមី**

រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ លោកអ្នកត្រូវតែរវៀសដៃរវៀស ជើងឲ្យបានសកម្មបន្តិច ពីព្រោះពេលវេលាជាមាសប្រាក់ធ្វើច្រើនបានផលមកក៏ច្រើន ប៉ុន្តែចូរកុំលោភលន់ឲ្យហួសពីកំរិតនៃវត្ថុធាតុនៅជុំវិញខ្លួនពេក ព្រោះការលោភលន់អាចបណ្តាលឲ្យលោកអ្នកអន្តរាយបាន ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញ ដាក់ចុះដុះឡើងតាមដៃ ។ ឯបញ្ហាស្នេហាគ្មានអ្វីគួរឲ្យកត់សម្គាល់នោះទេ ៕

**ឆ្នាំមមែ**

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងារទាំងអស់ដែលលោកអ្នកបានអនុវត្តនៅក្នុងរយៈពេលនេះ មិនមានបញ្ហាអ្វីគួរឲ្យកត់សម្គាល់ទេ ប៉ុន្តែក្នុងនោះលោកអ្នកគួរតែប្រុងប្រយ័ត្នក្នុងការសេពគប់មិត្តជង ព្រោះអាចប៉ះចំមនុស្សអាក្រក់ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញមិនសូវ បានផលប៉ុន្មានទេ ។ ឯបញ្ហាស្នេហា គូស្នេហ៍អាចមានការរកាំរកូសគ្នាខ្លះ បៀសពុំរួច ៕

**ឆ្នាំវក**

រាសីលោកអ្នកស្រុតចុះខ្លាំង ។ លោកអ្នកត្រូវប្រុងប្រយ័ត្នកាយត្រៀម ចាំទប់ទល់ក្រែងមានហេតុការណ៍មិនល្អកើតឡើងក្នុងខណៈពេលកំពុងបំពេញភារកិច្ច ហើយបើមានកើតឡើងមែន នោះចូរកុំយកកម្លាំងបាយទៅដោះស្រាយឲ្យសោះ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញ មានជួបនឹងឧបសគ្គច្រើនប្រការណាស់ ។ ឯបញ្ហាស្នេហា គូស្នេហ៍ច្រើននាំរឿងក្តៅក្រហាយឲ្យគ្នាទៅវិញទៅមក ៕

**ឆ្នាំរកា**

រាសីលោកអ្នកល្អជាមធ្យម ។ រាល់គោលដៅទាំងឡាយដែលលោកអ្នកបានរំពឹងទុកនោះ មកដល់ថ្ងៃនេះ មាទនពន្លឺព្រាលៗលេចចេញឡើងហើយ ទោះបីជាពន្លឺរស្មីនេះនៅមិនទាន់មានពេញលេញលើលោកអ្នកក៏ដោយ ក៏អាចចាត់ទុកថា ជាប្រផ្នូលយ៉ាងល្អប្រពៃដែរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញរកប្រាក់ចំណូលបានកាក់កបគ្រាន់បើ ។ ឯបញ្ហាស្នេហាគូស្នេហ៍ច្រើនចេះខន្តីដល់គ្នាជានិច្ច ៕

**ឆ្នាំច**

រាសីលោកអ្នកឡើងខ្ពស់ ។ លោកអ្នកត្រូវបានចៅហ្វាយនាយយល់ឃើញនូវសេចក្តីស្មោះត្រង់របស់អាត្មា ហើយប្រគល់កិច្ចការសំខាន់ ដែលមានប្រយោជន៍ឲ្យកាន់កាប់យ៉ាងជូនចិត្ត ប៉ុន្តែលោកអ្នកមិនគួរអួតអាងពេកនោះទេ ព្រោះនាំឲ្យបាត់បង់លាភ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញ មានការរីកលូតលាស់ទៅមុខជាលំដាប់ ។ ឯបញ្ហាស្នេហា គូស្នេហ៍មានភាពស្មោះត្រង់នឹងគ្នា ៕

**ឆ្នាំកុរ**

រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងារមានភាពរលូនគ្រប់យ៉ាង ក្នុងរយៈពេលនេះ លោកអ្នកអាចនឹងទទួលបានមកនោះ ក៏ធ្វើឲ្យលោកអ្នកមានការពេញចិត្តពេញថ្លើមដែរ តែមិនត្រូវធ្វើតាមទំនើងចិត្តឡើយ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញ លោកអ្នកបោះទុនច្រើនបានផលមកក៏ច្រើនដែរ ។ ឯបញ្ហាស្នេហា គូស្នេហ៍រួមរស់ជាមួយគ្នាបានសេចក្តីសុខក្សេមក្សាន្តណាស់ ៕

New Century Auto
Collision & Service Center
17 South Street, Lowell MA 01852
Telephone: (978) 710 - 3488

-ទទួលជួសជុលតួរថយន្ត ម៉ាស៊ីន បាញ់ថ្នាំ ប្រព័ន្ធភ្លើង ប្រព័ន្ធម៉ាស៊ីនត្រជាក់ ដោយជាងមានបទពិសោធន៍ច្បាស់លាស់យូរឆ្នាំ
-ឧបករណ៍ Technology ថ្មីបំផុតទទួលស្គាល់ដោយក្រុមហ៊ុន BMW Lexus Mercedes

AUTO BODY SERVICES
-លាយថ្នាំដោយប្រព័ន្ធ Computer ធានាដូច១០០%(នៅទីនេះ)
-ឧបករណ៍បាញ់ថ្នាំដើរដោយប្រព័ន្ធ Computer
-ជួសជុលរថយន្ត គ្រោះថ្នាក់ ប៉ះទង្គិច ឲ្យបានល្អស្អាតដូចដើម១០០%

តម្លៃសមរម្យ
គុណភាពខ្ពស់

REPAIR-MAINTENANCE
-ជួសជុលគ្រឿងម៉ាស៊ីន គ្រឿងក្រោម តាមលក្ខណៈបច្ចេកទេស
-ទទួលប៉ះកង់ ដូរកង់ ដូរប្រេង ដូរហ្វ្រាំង ពិនិត្យប្រព័ន្ធ បំពង់ខ្យល់ បំពង់ទឹក
-ជួសជុលប្រព័ន្ធ AC&Hit ជាទីទុកចិត្ត

ស្មោះត្រង់
ទាន់ចិត្ត សុវត្ថិភាព

New IS

-យានដ្ឋានយើងខ្ញុំទទួលស្គាល់ដោយក្រុមហ៊ុនធានារ៉ាប់រងជាច្រើន
(Mass,Hanover,Commerce,Trust,Arbella,Metropolitan,Safetygroup)
-ទទួលធ្វើការទំនាក់ទំនងជាមួយក្រុមហ៊ុនធានារ៉ាប់រង ជូនលោកអ្នកជាទីទុកចិត្ត

រថយន្តល្អ សុវត្ថិភាព ជីវិតបវរុងរឿង អនាគតភ្លឺថ្លា !

## តមកទំព័រទី ១០ ទិវាសាំងឡង់តាញ...

ពេលនេះនៅកំពុងឆ្លងកាត់រយៈកាលបែកបាក់ពីសហគមន៍ខ្លួនឯងមិនតិចទេ ហើយក៏បែកបាក់ពីសហគមន៍ពណ៌សម្បុរឯទៀតយ៉ាងដាច់ស្រឡះដែរ ។ ដូច្នេះសង្គមខ្មែរយើងមិនត្រឹមតែគ្មានលទ្ធភាពឱ្យសង្គមឯទៀតៗ ជួយខ្លួនបានតែប៉ុណ្ណោះទេ សូម្បីតែសង្គមខ្លួនឯងក៏ជួយមិនបានផង ។ គួរកត់សម្គាល់ថា សហគមន៍ខ្មែរយើងនៅហ្វីឡាដែលហៀវពុំមានវេជ្ជបណ្ឌិត ឬមេធាវីជាខ្មែរទេ ហាងលក់ដូរខ្មែរកំពុងតែមានចំនួនកាន់តែតិចទៅជាលំដាប់ ។ រីឯអ្នកមានសមត្ថភាពរស់នៅលើបន្ទាត់ក្រីក្រខ្ពស់ជាង ក៏មានចំនួនតិចតួចគេគួរឆ្ងល់ថា "តើសហគមន៍ខ្មែរយើងនៅឆ្នេរខាងកើត ឬឆ្នេរខាងលិចនឹងអាចងើបរួចពីហាយនភាពបានដែរឬទេ?

"ទិវាវ៉ាឡង់តាញ" ដែលយើងនាំគ្នាប្រារព្ធនេះទំនងជាផ្ដល់ចម្លើយវិជ្ជមានជូនសហគមន៍បាន ។ សេចក្ដីស្រឡាញ់ដោយគ្មានប្រាថ្នាអ្វីជាសគុណតបវិញ គឺបង្កើតនូវជំនឿរវាងគ្នានឹងគ្នា ហើយអាចមានចំណងជាមួយគ្នាឡើងវិញចំណេះ គឺប្រាកដជាកម្លាំង ជាថាមពលថ្មីដែលជាវឌ្ឍនភាពរបស់សហគមន៍ជាមិនខាន ៕

## តមកទំព័រទី ១ បន្តដំណើរប្រកួតជាបេក្ខជន...

អតីតព្រឹទ្ធសមាជិករដ្ឋផេនស៊ីវេនាក៏នៅលំដាប់ថ្នាក់ទី៣ ហើយត្រូវគេទស្សន៍ទាយថា អាចនឹងឡើងប្រជាប្រិយយ៉ាងខ្ពស់មកវិញបាន ។ ចំណែកឯ គីងគ្រិត វិញបានថយចុះយ៉ាងច្រើន ។

**តើពលរដ្ឋអាមេរិកាំង គេបោះឆ្នោតរបៀបណា?**

គឺច្បាស់ជាមិនដូចទម្លាប់ខ្មែរយើងពេលចេញទៅបោះឆ្នោតនោះទេ ។

ដំបូងគេចូលទៅវេបសាយ មើលឈ្មោះបេក្ខជននៅក្នុង The Republican Presidential Candidates -រួចហើយគេវាយអក្សរបញ្ចូល ហ្ស៊ីបកូដ នៃទីកន្លែងដែលគេរស់នៅ -បន្ទាប់មកមានសំនួរចំនួន១៩ នៃសេចក្ដីថ្លែងការណ៍របស់បេក្ខជនដែលអ្នកបោះឆ្នោតត្រូវជ្រើសរើសថា ពេញចិត្ត ឬទាត់ចោល ឬក៏ទុកចោលសិនក៏បាន -រួចហើយគេត្រូវពិនិត្យប្រធានបទដែលអ្នកបោះឆ្នោតយកចិត្តទុកដាក់ជាងគេ ហើយយ៉ាងហោចណាស់ក៏ត្រូវជ្រើសរើសឱ្យបានមួយដែរ -ចុងបញ្ចប់គេជ្រើសរើសយកបេក្ខជនណាមួយ ដែលអ្នកបោះឆ្នោតចង់បោះឆ្នោតឱ្យ (យ៉ាងហោចណាស់គួរជ្រើសរើសបីរូបដែរ) ដែលមានការពន្យល់ប្រហាក់ប្រហែលគ្នា ។

គឺនៅលើឈ្មោះនោះហើយ ដែលការបោះឆ្នោតសំដៅទៅលើគំនិតនៃអ្នកជំនាញខាងដឹកនាំសង្គម ពុំមែននៅលើរូបសម្បត្តិ ឬបុព្វហេតុអ្វីដែលតាមការស្មើភាពសុច្ចរិត និងយុត្តិធម៌នោះទេ ។

មិត រ៉មនី ជាងអ្នកជំនាញខាងសេដ្ឋកិច្ច រកប្រាក់ចំណូលបាន២៣លានដុល្លារក្នុងមួយឆ្នាំៗ ហើយរៃអង្គាសបានដើមទុនឃោសនាបាន ១៧៤លាន -ចំណែកអ្នកឯទៀតមានប្រាក់ចំណូលធម្មតា ហើយរៃអង្គាសបានពី២០ ទៅ៣០លានម្នាក់ៗ ។ តែទោះជាយ៉ាងនេះក្ដីកត្តាធនធានគ្រាន់តែបញ្ជាក់ពីជំនាញនៃបេក្ខជនពុំបានប្រាកដថា ជាអ្នកឈ្នះឆ្នោតយ៉ាងជាក់ច្បាស់នោះទេ ។

ការប្រកួតនៅតែមានជាបន្តយ៉ាងក្ដៅគគុកនៅឡើយ ៕

**កំណត់ខ្មែរប៉ុស្ដិ៍**


ភោជនីយដ្ឋាន ណាម វាង (ភ្នំពេញ)
Nam Vang Restaurant
571 Unit#1 Adams Svenue. Philadelphia, PA 19120
(inside Hong Kong Market) (215) 742-9488



រៀងរាល់ថ្ងៃលោកអ្នកអាចពិសាទឹកក្រឡុកគ្រប់សេជាតិផ្លែឈើ ដូចជា:
ទុរេន ឬ អាវូកាដូ ហើយជាពិសេស
មានទឹកអំពៅស្រស់ៗ

១_មុខជំនាញខាងម្ហូបខ្មែរ យ៉ាងចំណាន ដូចជា :
-គុយទាវភ្នំពេញ
-គុយទាវ ឬមី-ខគោ
-មីកន្ទាំង ឆារសាច់គោ
-មីកន្ទាំងឆារគ្រឿងសមុទ្រ
-បាយឆារគ្រប់មុខ
-សាច់គោអាំង ចង្កាក់ ជាមួយជ្រក់ល្ហុង

២_មុខជំនាញម្ហូបវៀតណាម ឈ្ងុយឆ្ងាញ់ ដូចជា :
-នំបញ្ចុកទឹកត្រីពិសេស
-នំបុ័ងបាតេ ឬសាច់គោអាំង
-ខគោ នំបុ័ង ឬ មី និងគុយទាវ
-បាយសរសាច់ជ្រូកអាំង ឬសាច់មាន់អាំង

Open 7 days a week from 9a.m-9p.m
បើក 7 ថ្ងៃក្នុងមួយអាទិត្យពីម៉ោង 9 ព្រឹក ដល់ 9 ល្ងាច



ក្រុមហ៊ុនទេសចរណ៍អន្តរជាតិ អង្គរ
(Since 1991)
ក្រុមហ៊ុនទេសចរណ៍អន្តរជាតិ-អង្គរ
Angkor International Travel Agency

World Wide Travel & Tour Service
Cambodia - Vietnam - Laos - Thailand

ទទួលផ្ញើរប្រាក់ទៅស្រុកខ្មែរ សេវាអន្តោប្រវេសន៍
សេវាលិខិតឆ្លងដែន កក់សណ្ឋាគារ ឬជួលឡាន

USA
4931 N. Old York Rd.
Philadelphia, Pa 19141
Tel: (215) 329-2036
Fax: (215) 329-7176
General Manager NARY PO
angkortravelphilly@yahoo.com

Cambodia Office: Victory Travel (Skin Belle)
No 57B, Eo Street 205 Touls Svay Prey 2.
Phnom Penh, Cambodia.
Ms. Chenda: 023-221069 * 012-851575
Or Mr. Sin Po: 012 429407 * 011-541111.

SERVING SINGAPOR, EVA AIR, CHINA, ASIANA KOREAN AILINES



ហាងខ្មែរជួសជុលរថយន្ត
បើចង់ឱ្យរថយន្តលោកអ្នករត់បានល្អ សូមអញ្ជើញ
Rathe's Auto Service

State and Emission Inspaction General Repairs and Maintenance

MON-SAT, 8:30AM-5:30PM
SUN. EMERGENCY ONLY

- ជាងមានបទពិសោធន៍ជាយូរឆ្នាំ -ជួសជុលរថយន្តគ្រប់ប្រភេទ
- មានដូរប្រេង ដូរហ្វ្រាំង ដូរកង់ និងករណីជាច្រើនទៀត ។
- មានត្រួតពិនិត្យគ្រឿងម៉ាស៊ីន DIAGNOSTICS ដោយឥតគិតថ្លៃ
- មានចុះថ្លៃពិសេស ចាប់ពីខែកុម្ភៈ ២០០៨ ទៅ : - ដូរប្រេងកិរិត ៥ ក្វាត $22
- INSPECTIONS រថយន្តឆ្នាំ 96 up $49.99+ តាក់ -មានជូនប័ណ្ណពិសេស សំរាប់ដូរប្រេងចុះថ្លៃពាក់កណ្ដាល នៅពេលយកមកជួសជុលអស់តម្លៃ $150.
- តម្លៃជួសជុលទូទៅ សមរម្យ ដោយទាបជាងហាងជួសជុលផ្សេងៗទៀត ។
- ប្ដេជាចិត្តធ្វើជូនដោយហ្មត់ចត់ គុណភាពខ្ពស់ មិនឱ្យខុសបំណងលោកអ្នកឡើយ។ ពិសេស ជួយទៅពិនិត្យដល់កន្លែងនូវរថយន្តណាដែលខូច STARTER ឬ ធុងអាគុយអស់ភ្លើងដោយឥតគិតថ្លៃ ។ *សូមអរគុណ !*

5105 N.2ND ST., PHILADELPHIA, PA 19120. TEL : (215) 329-2418
Fax : (215) 329-2419. Rath CELL : (215) 431-6376

# ស្ត្រី និង ជម្ងឺបេះដូង

**កំណត់ខ្មែរប៉ុស្តិ៍**

*វេជ្ជបណ្ឌិត ដនី និង ម៉ាយរូវ នៃមន្ទីរពេទ្យអាញូស្កាយ មានការចាប់អារម្មណ៍យ៉ាងខ្លាំង ចំពោះជម្ងឺបេះដូងស្ត្រី ដែលជាជម្ងឺដ៏សែនគ្រោះថ្នាក់ជាងគេ ហើយបែរជាស្ត្រីភាគច្រើន យកចិត្តទុកដាក់លើសុខភាពរបស់ខ្លួន តិចតួចទៅវិញ ។*


Dr. Donee


Dr. Mirow

*អត្ថបទវេជ្ជបណ្ឌិតរូបនេះបានបញ្ជាក់ថា ស្ត្រីជាច្រើនយល់ថា ជម្ងឺមហារីកដើមទ្រូងជាអ្នកយកជីវិតស្ត្រីច្រើនជាងគេ តែតាមពិតជម្ងឺបេះដូងស្ត្រីទេដែលយកជីវិតស្ត្រី៦ដងលើសនោះទៅទៀត ។ រោគសញ្ញានៃការគាំងបេះដូង អាចនឹងមិនដូចគ្នានឹងរោគសញ្ញាដែលបុរសមានទេ ដូចជាការចុកដើមទ្រូងជាដើម ។ ស្ត្រីមានជម្ងឺនេះ ច្រើនផ្តើមដោយឈឺកញ្ចឹងក -ឈឺថ្គាម -ឈឺដើមដៃ ហើយច្រើនហត់ ដង្ហើមខ្លីដោយត្រឹមធ្វើការតិចតួច ពេលខ្លះវាមិនទាំងបង្ហាញរោគសញ្ញាទាំងនោះទៀតផង ។ បើលោកស្រីមានអាការៈរោគសញ្ញានេះហើយធ្វើអ្វីមិនបាត់ក្នុងរយៈពេលខ្លី សូមទូរស័ព្ទទៅ ៩-១-១ ជាបន្ទាន់ឱ្យគេមកសង្គ្រោះ ។*

*អត្ថបទវេជ្ជបណ្ឌិត ដនី និង ម៉ាយរ៉ូវ ជាភាសាអង់គ្លេសមាននៅខាងក្រោមនេះ :*

**WOMEN AND HEART DISEASE**

By Dr. Mirow & Dr. Donee

Many women believe that heart disease is a man's problem, but heart disease is the #1 killer of women in the US today. Over 60% of women feel their biggest health threat is breast cancer but heart disease kills 6 times as many women as breast cancer. One in three women will lose their lives to heart disease, compared to one in 30 that will die from breast cancer. In fact, more women die of heart disease than all forms of cancer combined.

However, there is good news. There are steps that women can take to lower their risk of heart disease. If a woman does not realize heart disease is a health threat, she will not make heart healthy changes or respond to symptoms once they occur. It is vital that every woman (with their doctor's help) get informed and to know their risk factors for heart disease and work to decrease them.

Firstly, women must know that there are some risk factors that are different for women than for men. Heart disease symptoms may be milder in women or very different than the most commonly know heart attack symptom of crushing chest pain. The truth is women are more likely to experience unusual or atypical symptoms of heart disease including neck, jaw or arm pain, fatigue and shortness of breath with activity. In addition, heart attacks can also strike without warning. However, if a you or anyone you know develops arm, neck or chest discomfort that does not quickly resolve, she should call 9-1-1.

Notably, heart disease is not always genetic. Factors such as obesity, sedentary life style, diabetes, high cholesterol, high blood pressure, and smoking often largely contribute to heart disease. Women tend to develop heart disease an average of 10 years later in life than men because of the protective effects of estrogen on the heart before menopause. (Of note, estrogen treatment after menopause is not recommended because of the risks of developing cancer).

The important message here is that heart disease can be diminished. By managing blood pressure and cholesterol, eating right and losing weight (if indicated), quitting smoking and increasing physical activity, women with these risk factors can greatly reduce their chance of developing heart disease by as much as 80%. Unfortunately, heart disease risks are not an automatic part of the annual exam. Be a self-advocate and ask for lab work and ask if a baseline electrocardiogram (EKG) is appropriate for you. An EKG is a snap shot in time. It does not predict future heart damage. Further testing (i.e. monitoring of the heart when a person is exercising) may be needed.

Be informed. Be a self advocate. Know how to decrease your risk factors for American's number one killer and do it. Encourage others to be active in getting more information about their risks for heart disease.

**IMPORTANT TAKE HOME POINTS:**

1) Heart disease is common in men and women. In fact, it is the most common cause of death in men and women in the US.

2) Some risk factors for heart disease and some symptoms of heart disease are different for women. Women need to be informed and act now to lower their risk of developing heart disease.

3) Besides genetics, factors such as obesity, sedentary life style, diabetes, high cholesterol, high blood pressure, and smoking often largely contribute to heart disease.

4) Be a self advocate. Ask your doctor about your risk factors for heart disease.

5) Everyone is an individual so discuss if you need further testing based on your personal risk factors for heart disease (i.e. cholesterol lab work, baseline EKG, weight loss plan, cardiology evaluation, aspirin therapy, stress testing).

6) Uncontrolled high blood pressure, cholesterol, and diabetes significantly increase the complications of heart disease.

7) Smoking has a significantly negative effect on heart disease. If you smoke please get information about how to stop.

Phở Hà Saigon
Vietnamese Restaurant
7 days A Week
9am-9pm
B.Y.O.B.
ជាហាងដែលធ្វើ ហ្វើ ឆ្ងាញ់ជាងគេនៅហ្វីឡាដែលហ្វៀ
ចុងភៅដែលពូកែធ្វើ ហ្វើ និងម្ហូបផ្សេងៗឯទៀត
ត្រូវមាត់ភ្ញៀវគ្រប់ៗរូប ឥឡូវនេះមកធ្វើម្ហូបនៅហាងយើងខ្ញុំ
ហើយធានាថា ម្ហូបអាហារហាង Phở Hà Saigon
និងបំរើលោកអ្នកបានយ៉ាងពេញចិត្តគ្រប់ពេលវេលា
320 W. Oregon Avenue, Suite 1. Philadelphia, PA 19147
Tel: (215) 389-1002 (Inside Oregon Market)
VISA MasterCard DISCOVER

